សារព័ត៌មាន ខ្មែរផុស ស.រ.អា
KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការរឿង Vol 07 Issue 134- July 26th- August 08th. 2013



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# សម រង្ស៊ី ត្រូវបានរាស្ត្រទទួលដូចស្តេច

**ដោយ : ខ្មែរផុស ស.រ.អា**





លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិត្រូវបានត្រឡប់មកដល់កម្ពុជានាព្រលានយន្តហោះភ្នំពេញថ្ងៃទី១១ កក្កដា វេលាម៉ោង៩ព្រឹក ក្រោមការទទួលគារវកិច្ចយ៉ាងកក់ក្តៅពីដៃគូប្រយុទ្ធ កឹម សុខា គណកម្មការនាយក និងសមាជិកបក្សរបស់លោកជាច្រើនម៉ឺននាក់ ដូចសម្តេចសីហនុកាលពីឆ្នាំ១៩៩១ លោក សម រង្ស៊ី បានលុតជង្គង់ថើបដីមាតុភូមិជាទីនឹករលឹកដែលលោកបានបែកជិត៤ឆ្នាំមកហើយមុននឹងទៅសម្តែងការគួរសមការីករាយ និងរំភើបចិត្ត ចំពោះមហាជនដែលបានមកកំដរដំណើរមកដល់របស់លោក... តែលើកនេះមហាជនបានបង្ហាញកម្លាំងសាមគ្គីដ៏រឹងមាំនឹងដ៏ធំមួយទៀត ដល់គណបក្សកាន់អំណាចថា ប្រជាប្រិយភាពរបស់ខ្លួនកំពុងប្តូរដៃហើយ ។ គេនាំគ្នានិយាយថា មិនដែលឃើញមហាជនខ្មែរចេញមកអបអរសាទរវីរៈជន សម រង្ស៊ី រួមគ្នា និង កឹម សុខា ច្រើនដូចពេលនេះទេ នេះជាសញ្ញាថ្មីថា គណបក្សសង្គ្រោះជាតិអាចនឹងទទួលបានសន្លឹកឆ្នោតសន្លឹកសន្ធាប់អាចនឹងឈ្នះជាអ្នកចូលមកកាន់អំណាចទៀតផង ។ តទៅទំព័រទី ១៨

# ពីធីសម្ភោធការិយាល័យ ខ្មែរផុស ស.រ.អា






**ដោយ: ខ្មែរផុសស.រ.អា**

មន្ត្រីសាលាក្រុងមន្ត្រីក្រសួងកិច្ចការសេដ្ឋកិច្ចនានា មេធាវីបុគ្គលិកធនាគារ និងក្រុមមិត្តនៃខ្មែរផុសប្រមាណ៤០នាក់ បានមកចូលរួមសម្តែងការអបអរសាទរចំពោះការបើកការិយាល័យរបស់ខ្មែរផុសនៅទីក្រុងឡូវែល កាលពីថ្ងៃទី១៨កក្កដា ២០១៣កន្លងទៅនេះ ។ តទៅទំព័រទី ០៨

# ខួបបីឆ្នាំនៃក្លឹបសារព័ត៌មានខ្មែរប៉ុស្តិ៍ក្រុងឡូវែល

*កាលពីថ្ងៃទី២៩ ខែមិនា ឆ្នាំ២០១៣*

(ពីលេខមុន)

ទីប្រឹក្សាក្រុងឡូវែលខ្មែរទីមួយលោក ឫទ្ធី អ៊ុង : សម្តែងចំណាប់អារម្មណ៍ក្នុងកម្មវិធីក្លឹបសារព័ត៌មានខ្មែរប៉ុស្តិ៍ថា អ្វីដែលខ្ញុំធ្វើ គឺដើម្បីការពារខ្មែរ ជួយខ្មែរវប្បធម៌ខ្មែរ ហើយចម្រៀងខ្ញុំច្រៀង គឺច្រៀងពីសន្តានចិត្តស្រឡាញ់ខ្មែរ ព្រោះខ្ញុំកើតមកជាខ្មែរមានសញ្ជាតិជាខ្មែរសក់ជាខ្មែរ ឈាមជាខ្មែរ និងដូនតាជាខ្មែរ។ លោកលើកឡើងថា មានតែខ្មែរទេ ទើបអាចលើកស្ទួយខ្មែរបាន។ អ្វីដែលយើងស្ថាបនា គឺមិនងាយស្រួលរក្សាទេតែការបំផ្លាញ គឺងាយស្រួលណាស់ ដូច្នេះបើយើងមានអ្វីដែលស្ថាបនាហើយ គឺទាមទារការលើកស្ទួយជាចំបាច់។

នាយកផ្នែកទីផ្សារ ដេប ឌីវៀន (Deb Davian) នៃស្ថាប័នសុខភាពរបស់មជ្ឈិមវ័យ (Senior Whole Health) : លោកស្រីប្រញាប់ប្រញាល់ធ្វើដំណើរហោះហើរពីរដ្ឋហ្វ័រីដា ដើម្បីមកចូលរួមកម្មវិធីក្លឹបសារព័ត៌មានខ្មែរប៉ុស្តិ៍ឱ្យទាន់ពេលវេលា ។



លោកស្រីបានមានប្រសាសន៍ថា តម្លៃនៃក្រុមគ្រួសារ គឺមានសារសំខាន់ណាស់ សម្រាប់ជាតិសាសន៍អាស៊ី ដោយលោកស្រី បានធ្វើការស្វែងយល់ពីផ្នត់គំនិត ឬសតល់អត្តចរិតយកចិត្តទុកដាក់ដឹងគុណដែលប្រជាជនអាស៊ីមានចំពោះឪពុកម្តាយជីដូនជីតាជរារបស់ខ្លួន។ ដូចនេះការថែរក្សាពួកគាត់ឱ្យមានសុខភាព សុវត្ថិភាព និងឱ្យពួកគាត់មានភាពកក់ក្តៅនៅក្នុងផ្ទះជាភារៈរបស់ស្ថាប័នយើង ហើយស្ថាប័នយើងមានមោទនភាពក្នុងការឧបត្ថម្ភគាំទ្រការផ្សាយរបស់កាសែតខ្មែរប៉ុស្តិ៍។ សូមអរគុណ!

លោក តុល្លាយុត្តិ ឌឹក អ្នកចាត់ចែងទូទៅនៅអាឃ្យូឃែរ (Accu Care) ជាស្ថាប័នបម្រើសេវាថែទាំសុខភាពដល់ចាស់ជរាតាមផ្ទះបានមានប្រសាសន៍



ក្នុងកម្មវិធីក្លឹបសារព័ត៌មានខ្មែរប៉ុស្តិ៍លើកទី៣ថា អតិថិជនដែលទទួលនូវសេវាកម្មពីអាឃ្យូឃែរ (Accu Care) មាន៩៩%ជាជនជាតិខ្មែរ ហើយយើងមានបុគ្គលិក PCA ដែលបម្រើការនៅតំបន់៣សំខាន់ គឺឡូវែល លីន និង រីវៀ ដែលមានខ្មែរភាគច្រើនរស់នៅ។ លោកបន្តថា ចាស់ជរាប្រមាណ១០០នាក់ ទទួលសេវានេះ ហើយយើងមានបុគ្គលិកជាជនជាតិខ្មែរបំពេញការងារពេញម៉ោង ។ អត្ថប្រយោជន៍ជាច្រើនដែលលោក តុល្លា យុត្តិ បានលើកឡើងពីការបម្រើសេវាថែទាំសុខភាពដល់ចាស់ជរាតាមផ្ទះរួមមាន គឺជាក់ស្តែងចាស់ជរាទទួលបានការថែទាំសុខភាពទៅលើការរស់នៅប្រចាំថ្ងៃរបស់ពួកគាត់ ។ម្យ៉ាងវិញទៀត អាឃ្យូឃែរ (AccuCare) បានផ្តល់ដល់បុគ្គលិកដែលជាជនជាតិខ្មែរឱ្យមានការងារធ្វើ ហើយលោកបន្ថែមថា អាឃ្យូ ឃែរ(AccuCare) នឹងខិតខំពង្រីកសេវានេះឱ្យបានកាន់តែទូលាយ ក៏ដូចជាពង្រីកឱកាសការងារដល់ប្រជាជនខ្មែរឱ្យបានកាន់តែច្រើនផងដែរ។ យ៉ាងណាមិញលោកសំណូមពរដល់សមាជិកគ្រួសារទាំងអស់ សូមជួយពន្យល់ណែនាំដល់មនុស្សចាស់ទាំងក្នុងក្រុមគ្រួសារ និងមនុស្សចាស់ផ្សេងទៀតឱ្យយកចិត្តទុកដាក់ថែទាំសុខភាពឱ្យបានល្អប្រសើរដើម្បីប្រយោជន៍លោក អ៊ំ លោកពូ អ្នកមីង លោកយាយលោកតាទាំងអស់គ្នា។

លោក ម៉ៃខល ណាស្ស (Michale Nash) អញ្ជើញមកពីឱសថស្ថានសម្រាប់សហគមន៍សិន ត្រលហៀល (Central Health) ផ្តល់ជូននូវសេវាកម្មដល់អ្នកប្រើប្រាស់ថ្នាំឱ្យបានត្រឹមត្រូវតាមក្បួនខ្នាត និងវេជ្ជបញ្ជា ។ បានបញ្ជាក់ថា សុខភាពរបស់លោកអ្នក គឺជាទំនួលខុសត្រូវរបស់យើងទាំងអស់គ្នា ។ ដរាបណាលោកអ្នកមានសុខភាពល្អនោះធនធាន និងជីវភាពរស់នៅរបស់លោកអ្នកក៏ប្រសើរផងដែរ។ សូមអរគុណចំពោះការគាំទ្រ និងការជឿទុកចិត្តរបស់លោកអ្នកចំពោះឱសថស្ថានរបស់យើងខ្ញុំ។



លោក វ៉ាន់ ពេជ្រ (Van Pich) ប្រធានកម្មវិធីបុណ្យអ៊ុំទូកប្រចាំតំបន់អាស៊ីអាគ្នេយ៍បានលើកឡើងនៅក្នុងរាត្រីខួបបីឆ្នាំនៃក្លឹបសាព័ត៌មាន



តទៅទំព័រទី ០៩

# ព្រះតេជគុណ ពិន សែន វត្តរាជបូរខេត្តសៀមរាប បន្តអត្ថិភាពសិល្បៈល្ខោនស្រមោលស្បែកធំ






ដោយៈ សុខា

**ទីក្រុងញូយ៉កៈ** ទស្សនីយភាពនៃការសម្ដែងសិល្បៈល្ខោនស្រមោលស្បែកធំវត្តរាជបូរនៅមជ្ឈមណ្ឌលហិរញ្ញវត្ថុពិភពលោក (World Financial Center) នាទីក្រុងញូយ៉កខែមេសាឆ្នាំ២០១៣ កន្លងទៅនេះ បានធ្វើឱ្យទស្សនិកជនជាតិ និងអន្តរជាតិបានជ្រាបអំពីសិល្បៈខ្មែរមួយប្រភេទដែលមានវ័យចំណាស់ ហើយត្រូវបានប្រមូលចងក្រងថែរក្សា ដោយព្រះតេជគុណព្រះនាម ពិន សែន គង់នៅវត្តរាជបូរខេត្តសៀមរាប។ វីលោក វ៉ាន់ សុភាវុធ ស្ថិតក្នុងឈុតពណ៌សសុទ្ធជាអ្នកដឹកនាំក្រុមសម្ដែងក្នុងការសម្ដែងនារាត្រីនោះ។ ល្ខោនស្រមោលស្បែកធំជាធម្មតាសម្ដែងជាក្រុមតម្រូវឱ្យមានអ្នកសម្ដែងជា








មធ្យមពី២០ទៅ២២នាក់ ក្នុងនោះមានអ្នកភ្លេងចំនួន១១នាក់ ដើម្បីប្រគុំភ្លេងពិណពាទ្យ។ ចំណែកឧបករណ៍ភ្លេងពិណពាទ្យតាមប្រសាសន៍លោក វ៉ាន់ សុភាវុធ រួមមាន រនាដឯក រនាដដែក រនាដធុង ស្គរធំ គងធំ គងតូច ស្រឡៃ ឈឹង សាំងណា (ស្គរមុខពីរ) សម្ភោ និងរនាដថាំ សរុបគឺ១១ឧបករណ៍។ ក្រៅពីអ្នកភ្លេងអ្នកកាន់ស្បែក គឺអ្នកពោលពីរនាក់ដំចំណានដែលចេះចាំសាច់រឿងរាមកេរ្តិ៍ខ្មែរស្ទូត្រលើកដាក់សម្លេងបានយ៉ាងស្ទាត់ញ៉ាំងឱ្យទស្សនិកជនភ្ញាក់ផ្អើលនឹងទេព្យកោសល្យថ្វីមាត់ដំណាលព្រឹត្តិការណ៍ឈុតឆាកពីមួយទៅមួយឥតមានអាក់។ អ្នកពោលពីររូបដំចំណាននោះរួមមានឈ្មោះកញ្ញាសឿន សារុំ និងលោក ហង្ស សាមន ។ ក្រុមសិល្បៈសម្ដែងល្ខោនស្រមោលស្បែកធំនេះចំណាយពេលយ៉ាងហោចពី៦ទៅ៨ឆ្នាំ ដើម្បីចេះចាំសម្ដែងឱ្យល្អបាន។ ដោយឡែកពីអ្នកសម្ដែងកាន់ស្បែកឧបករណ៍ភ្លេង អ្នកពោល គឺបន្ទះស្បែកដែលត្រូវបានដាប់ឆ្លាក់ជារូបផ្សេងៗស្ដីពីរឿងរាមកេរ្តិ៍ ដើម្បីយកមកប្រើជាស្រមោលក្នុងការសម្ដែង។ លោកសុភាវុធបានបន្តប្រាប់ខ្មែរផុស ស.រ.អា ថា ជាទូទៅបន្ទះស្បែកមានចន្លោះពី៨៨ទៅ៨៩បន្ទះ ប៉ុន្តែទម្ងន់ស្បែកធ្ងន់ និងត្រូវបញ្ជូនតាមយន្តហោះពេលសម្ដែងនៅអាមេរិក ហេតុដូច្នោះហើយចំនួនបន្ទះស្បែកត្រូវយកសង្ខេបបំផុតត្រឹម៧៦បន្ទះ។

ព្រះតេជគុណពិន សែនបានមានពុទ្ធដីកាថា សិល្បៈជាគ្រឿងលម្អរបស់ជាតិនិមួយៗ៕

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

នឹងជួយបណ្តុះបណ្តាលថែរក្សាការពារព្រះរាជបល្ល័ង្កសម្តេចសីហនុលុះត្រាអវសាន្ត ប្រសិនបើទ្រង់គ្រប់គ្រងប្រទេសជាតិប្រកបដោយទសពិធរាជធម៌ ។ ក្រោយពីបានស្របគំនិតគ្នាត្រឹមត្រូវហើយ ក្រុមអ្នកជាតិនិយម ក៏បានបង្កើតសារព័ត៌មានជាភាសាខ្មែរមួយឱ្យឈ្មោះកាសែតនគរវត្ត ដែលមានលោក ម៉ាច ឈឺន ជាចាងហ្វាង និងលោក សឺន ង៉ុកថាន់ ជានិពន្ធនាយក ហើយបានទទួលការឧបត្ថម្ភខាងផ្នែកហិរញ្ញវត្ថុពីក្រុមរាជវាំង ។ កាសែតនគរវត្តចាត់ទុកថា ជានិមិត្តរូបនៃការភ្ញាក់រលឹក និងជាគ្រឿងដាស់សតិសម្បជញ្ញជាតិខ្មែរឱ្យក្រោកឡើងក្នុងសម័យនោះផង ជាកាសែតអ្នកជាតិនិយមធ្វើការបំរើ និងការពាររាជបល្ល័ង្កផង ព្រោះក្នុងឆ្នាំ១៩៣៧ លោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកពុំដែលមានគំនិតណាមួយប្រឆាំងនឹងរាជបល្ល័ង្កសោះឡើយ ។ លោកគ្រាន់តែចង់បានស្តេចមួយអង្គដែលមានតម្រិះវិជ្ជា ហើយដែលគ្រប់គ្រងប្រទេសជាតិត្រឹមត្រូវតាមទសពិធរាជធម៌តែប៉ុណ្ណោះ ។ កាលនោះពួកលោកឥតមានតណ្ហាជាអ្នកប្រាថ្នាដឹកនាំប្រទេស ឬជាអ្នកកាន់អំណាចសោះឡើយ គឺគ្រាន់តែជាអ្នកស្នេហាជាតិដែលត្រូវបំពេញករណីកិច្ចជូនជាតិមាតុភូមិតែប៉ុណ្ណោះឯង ។ ជាពិសេសលោក សឺន ង៉ុកថាន់ ដែលធ្លាប់បានទៅបន្តការសិក្សាផ្នែកគរុកោសល្យឯប្រទេសបារាំងនោះតែងតែមានគំនិតចង់ឱ្យមានការអប់រំកូនចៅខ្មែរដែលជាសាច់ឈាមរបស់លោកឱ្យមានចំណេះវិជ្ជាជុះដាលក្នុងក្របខណ្ឌឥណ្ឌូចិន កុំឱ្យចាញ់សាសនាយួនដែលបារាំងស្រលាញ់ជាងខ្មែរក្នុងសម័យអាណានិគមបារាំងអ្នកដែលបានទៅបន្តវិជ្ជានៅឯប្រទេសបារាំង លុះត្រាតែបារាំងទុកចិត្ត និងយល់ព្រមផង ទើបទៅបាន ។

ដោយធ្លាប់បានទទួលការសិក្សានៅប្រទេសបារាំងនោះ លោក សឺន ង៉ុកថាន់ តែងដឹងគុណ និងសរសើរអារិយធម៌បារាំងជានិច្ច ។

ប្រសិនបើលោកអ្នកស្អប់បារាំង ក៏ស្អប់ក្នុងការស្រលាញ់ ហើយលោកតែងមានគំនិតចង់យកវប្បធម៌បារាំងមកផ្សព្វផ្សាយជួយកូនខ្មែរឱ្យរៀនសូត្រដើម្បីឱ្យមានតម្រិះវិជ្ជាកសាងប្រទេសខ្មែរឱ្យចំរើនរុងរឿង ដូចអរិយប្រទេសទាំងឡាយក្នុងសាកលលោក ។ លោក សឺន ង៉ុកថាន់ មិនបានយកបារាំងជាសត្រូវទេ ព្រោះលោកយល់យ៉ាងច្បាស់ថា ដល់ពេលណាបារាំងត្រូវដកខ្លួនចេញពីប្រទេសកម្ពុជាពេលនោះខ្មែរប្រាកដជាត្រូវការតស៊ូប្រឆាំងនឹងចក្រព័ត្តិអាអាណានិគមជិតបង្កើយ គឺសៀម និងយួនដែលតែងតែមានគំនិតលោភលន់ចង់ទន្ទ្រានវាតទីយកទឹកដីខ្មែរជានិច្ច ព្រោះគេមានគម្រោងការលេបត្របាក់ប្រទេសខ្មែរយូរណាស់មកហើយ គេថែមទាំងបានដាក់ចលនាគេឱ្យធ្វើការអនុវត្តន៍ទៀតផង តាំងតែពីឆ្នាំ១៩៣០កន្លងមកម្ល៉េះ ។


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

អាស្រ័យហេតុនេះហើយ បានជាក្នុងសម័យនោះ កាសែតនគរវត្តពុំទាន់បានចេញមុខប្រឆាំងនឹងអំណាចបារាំងនៅឡើយទេ គឺគ្រាន់តែធ្វើការអំពាវសុំឱ្យបារាំងបន្ធូរបន្ថយការគ្រប់គ្រងឱ្យសមដូចសន្ធិសញ្ញាឆ្នាំ១៨៨៣ មុនការភ្ជង់កស្តេចខ្មែរ និងចំពុះទង់ប៉ុណ្ណោះឯង ។ ម៉្លោះហើយសកម្មភាពរបស់លោក សឺន ង៉ុកថាន់ បានត្រឹមតែប្តូរស្តេចសោយរាជពី ស៊ីសុវត្ថិ មុនីវ៉េត មកជានរោត្តម សីហនុ តែប៉ុណ្ណោះ ។ ម្យ៉ាងវិញទៀត ប្រសិនបើក្រុមលោក សឺន ង៉ុកថាន់ ចេញមុខប្រឆាំងនឹងបារាំងដោយកម្លាំងឃោរឃៅក្នុងសម័យនោះ ប្រាកដជារាជសម្បត្តិរបស់ព្រះបាទសីនហុពុំអាចកើតមានបានឡើយ ។

កាសែតនគរវត្តបានត្រឹមតែអប់រំប្រជាពលរដ្ឋខ្មែរ ឱ្យមានសេចក្តីភ្ញាក់រលឹកតាមផ្លូវញ្ញាតាមលំអានព្រះពុទ្ធសាសនាតែប៉ុណ្ណោះ ហើយគ្រាន់តែពន្យល់នូវកំហុស និងចំណុចខ្សោយទាំងឡាយដែលខ្មែរយើងបានប្រព្រឹត្តខុសកាលពីក្រោយសម័យមហានគរ សមដូចសម្តីបារាំងតែងបានជេរ្យលត្មេះយើងជាញយៗថា ខ្មែរជាសាសន៍ល្ងង់ខ្លៅមិនស្គាល់មាតុភូមិជាអ្វី ឬឯករាជ្យជាអ្វីផងទេ ។ គេថាខ្មែរចូលចិត្តពឹងផ្អែកលើអ្នកដទៃខ្មែរកាន់ពុទ្ធសាសនារាប់ពាន់ឆ្នាំមកហើយ នាំគ្នាសូត្រតាមគម្ពីរបាលីបិដកកោក១ទាំងលោកសង្ឃទាំងគ្រហស្ថ ក៏ប៉ុន្តែអត់យល់ថាម៉េចទេ ។ល។ ដូច្នេះកាសែតនគរវត្តបានបបួលគ្នារិះរកមធ្យោបាយដកស្រង់ពុទ្ធវចនៈខ្លះ១ ដែលមាននៅក្នុងគម្ពីរពុទ្ធសាសនាយកមកអធិប្បាយពន្យល់ប្រជាពលរដ្ឋឱ្យយល់ច្បាប់ ហើយឱ្យប្រតិបត្តិតាម ឧទាហរណ៍ : **អត្តនោ នាថោ កុសលា ធម្មា អកុសលា ធម្មា អព្យាកតា ធម្មា** ។ល។ ក្រៅពីការអប់រំតាមកាសែតនគរវត្តក្រុមលោក សឺន ង៉ុកថាន់ ក៏បានប្រាស្រ័យទាក់ទងយ៉ាងជិតស្និទ្ធជានិច្ចកាល ជាមួយព្រះសង្ឃអ្នកមានតម្រិះវិជ្ជាជាន់ខ្ពស់ ដើម្បីប្តូរយោបល់គ្នាក្នុងការអប់រំប្រជាពលរដ្ឋឱ្យយល់បញ្ហាប្រទេសជាតិ សាសនា រាជបល្ល័ង្ក ។ ទាំងអស់គ្នាបានប្រៀបធៀបប្រទេសទៅនឹងរទេះ ។ តួរទេះដែលអាចទៅមុខកើត លុះត្រាតែមានកង់មានអ្នកអូសទាញ និងមានអ្នកបរ ។ ពុទ្ធចក្រ និងអាណាចក្រទុកដូចជាកង់រទេះសម្រាប់ឱ្យវិលទៅជាមួយតួរទេះ ។ ពុទ្ធជាភារៈលើបព្វជិតពុទ្ធសាសនិក ឯអាណាចក្រជាភារៈលើរដ្ឋាភិបាលគ្រហស្ថ ។ ចក្រ ឬអំណាចទាំងពីរនេះ ត្រូវតែវិលទៅជាមួយគ្នាជាដរាប ប្រសិនបើកង់ណាមួយមិនវិលកង់ឯទៀតក៏មិនវិល ហើយតួរទេះក៏មិនកម្រើកទៅមុខដែរ ។ ម្យ៉ាងវិញទៀត ប្រជារាស្ត្រទាំងមូលសុខចិត្តស្លាប់រស់ជាមួយពុទ្ធសាសនាតាំងពីយូរលង់មកហើយ ។ គ្រាមានអាសន្នអន់ក្រខ្មែរតែងតែយកវត្តយកព្រះសង្ឃជាទីពឹងផ្អែកទាំងផ្លូវកាយទាំងផ្លូវចិត្ត ។

ដោយហេតុនេះហើយ បានជាលោក សឺន ង៉ុកថាន់ ក្តីលោកគ្រូអាចារ្យ ហែម ចៀវ ដែលជាសាស្ត្រាចារ្យសាលាបាលីជាន់ខ្ពស់សម័យនោះក្តីបណ្ឌិតអ្នកប្រាជ្ញដទៃទៀតក្តី បានបង្កើតគំនិតឱ្យមានកម្មវិធីទេសនានៅក្នុងបន្ទាយកងពលទាហានជើងក្រហម និងទាហានជើងខ្មៅ ដើម្បីអប់រំទាហានឱ្យដូចកងទ័ពបារាំង និងទ័ពបរទេសដែលគេតែងតែមានចារ្យខាងសាសនាគ្រិស្តទេសនាប្រដៅទាហានរបស់គេ ។ កាលនោះបារាំងចេះតែញុះញង់ទាហានទាហានជើងក្រហម និងទាហានជើងខ្មៅឱ្យឈ្លោះគ្នា ។ ដូច្នេះលោក សឺន ង៉ុកថាន់ ក៏ប្រឹងចាត់ព្រះសង្ឃដែលជាអ្នកប្រាជ្ញខាងទេសនាឱ្យនិមន្តទៅទេសនាអប់រំទាហានគ្រប់បន្ទាយ ។ ព្រះសង្ឃដែលល្បីល្បាញខាងទេសនាជំនាន់នោះគឺលោកអាចារ្យ ហែម ចៀវ, សូ ហាយ, ប៉ាំង ខាត់, ខៀវ ជុំ, អ៊ុក ជា ។ល។

ក្រុមលោក សឺន ង៉ុកថាន់ ថែមទាំងបានបង្កើតសមាគមមួយឈ្មោះ "**សមាគមពុទ្ធមាមិកជន**" ដែលអាចឱ្យលោកងាយទាក់ទងប្រាស្រ័យជាមួយពុទ្ធបរិស័ទទាំងពុទ្ធជិតទាំងគ្រហស្ថ ហើយស្នើសុំឱ្យមានកម្មវិធីទេសនារៀងរាល់ថ្ងៃសីល (កាលនោះខ្ញុំអាយុ៨ឆ្នាំ ជាក្មេងវត្តនៅឡើយ) ទូទៅពេញព្រះរាជាណាចក្រកម្ពុជា។ ក្រោយពេលចង្ហាន់ថ្ងៃត្រង់លោកគ្រូចៅអធិការតែងយកកាសែតនគរវត្តមកអាន រួចហើយអធិប្បាយពន្យល់ពុទ្ធបរិស័ទទាំងចាស់ទាំងក្មេងឱ្យយល់ច្បាស់នូវពុទ្ធវចនៈដ៏មានខ្លឹមសារ មិនដែលខានថ្ងៃសីលណាមួយឡើយ ។ មិនតែប៉ុណ្ណោះនៅពេលមានបុណ្យធំៗ ដូចជាបុណ្យផ្កា, កឋិន, ចូលឆ្នាំជាដើម គេសង្កេតឃើញព្រះសង្ឃដែលជាគ្រូអាចារ្យដែលមានឈ្មោះល្បីល្បាញតែងនិមន្តទៅទេសនាគ្រប់ភូមិស្រុក ។ សកម្មភាពទេសនារបស់ព្រះសង្ឃនៅគ្រប់ទិសទីនេះ ប្រៀបបីដូចគេទូងស្គរ ឬជួង ដាក់សាធារណជនខ្មែរឱ្យភ្ញាក់រលឹកឱ្យមានសតិសម្បញ្ញៈជាតិយ៉ាងរហ័សហើយច្បាស់លាស់មែនទែន រហូតដល់អាជ្ញាធរបារាំងស្អប់ និងចងគំនុំរករឿងព្រះសង្ឃខ្មែរជាងគេ ដោយចោទប្រកាន់ថាលោកសង្ឃជាឈ្លើងជញ្ជក់ឈាមរាស្ត្រ ។

នៅខែមិថុនា ឆ្នាំ១៩៤០ កងទ័ពអាល្លឺម៉ង់ដ៏បានវាយលុកចូលភាគត្បាត **តទៅលេខក្រោយ**

តមកពីទំព័រទី ០២

## ខួបពាឆ្នាំនៃក្លឹបសារព័ត៌មានខ្មែរផុស...

ខ្មែរប៉ុស្តិ៍សហរដ្ឋអាមេរិកថា មកដល់ឆ្នាំនេះ គឺឆ្នាំទី១៨ ដែលយើងប្រារព្ធនូវពិធីបុណ្យអុំទូក ហើយយើងសង្ឃឹមថា ប្រជាជនទាំងអស់គ្នានឹងរីករាយសាទរក្នុងកម្មវិធីនេះ។ លោកក៏ឆ្លៀតឱកាសនោះជូនពរដល់បងប្អូនខ្មែរទាំងអស់សូមបានជោគជ័យមង្គលក្នុងឱកាសបុណ្យចូលឆ្នាំថ្មីផងដែរ។

លោក សំខាន់ ខឿន ជាអ្នកស្ម័គ្រចិត្តក្នុងគម្រោងវែរអង្គាសបច្ច័យកសាងវត្តខ្មែរឡូវែល និងមជ្ឈមណ្ឌលវប្បធម៌ខ្មែរ ហើយជាអតីតនាយកប្រតិបត្តិសមាគមខ្មែរមុនបញ្ចេញមតិក្នុងកម្មវិធីលោកលើកសរសើរកាសែតខ្មែរប៉ុស្តិ៍ សូមចូលរួមត្រេកអរចំពោះការបំពេញការងារបានយ៉ាងល្អដល់សារព័ត៌មាននេះ ទើបលោកបន្តលើឡើងថា លោកអញ្ជើញមកក្រុងឡូវែល១៥ឆ្នាំហើយ ។ បច្ចុប្បន្នលោកកំពុងស្ម័គ្រចិត្តក្នុងគម្រោងវែរអង្គាសបច្ច័យកសាងវត្តខ្មែរឡូវែល និងមជ្ឈមណ្ឌលវប្បធម៌ខ្មែរដែលត្រូវការទឹកប្រាក់១០លានដុល្លារ ។ លោកបានធ្វើទំហៀបន័យពីភាពយូរអង្វែងនៃគម្រោងកសាងវត្តខ្មែរឡូវែល និងមជ្ឈមណ្ឌលវប្បធម៌ខ្មែរទៅនឹងថេរវេលាដែលប្រជាជនខ្មែរប្រើទម្រាំតែកសាងបានប្រាសាទអង្គរវត្តដូច្នោះដែរ។





លោក ខាំ ស៊ីនួន អញ្ជើញមកពីគណបក្សសង្គ្រោះជាតិបានលើកឡើងនៅឯវេទិការសាធារណៈនោះថា កម្ពុជានាពេលនេះមានគណបក្សនយោបាយពីរសំខាន់ៗដែលបានបញ្ចូលគ្នាតែមួយពោលគឺលោកសំដៅដល់ការច្របាច់បញ្ចូលគ្នារវាងគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សបានជាគណបក្សមួយមានឈ្មោះថា គណបក្សសង្គ្រោះជាតិ ។ លោកក៏បានគោរពអញ្ជើញសាធារណៈជជែកសំណេះសំណាលផ្ទាល់ជាមួយលោកប្រធានគណបក្សសង្គ្រោះជាតិ សម រង្ស៊ី ផងដែរ។

លោក អ៊ូ សុវណ្ណ កុងស៊ុលកិត្តិយសនៃព្រះរាជាណាចក្រកម្ពុជាប្រចាំក្រុងឡូវែលរដ្ឋម៉ាសាឈូសេតនាឱកាសនោះលោកបានលើកឡើងបញ្ជាក់ដល់សាធារណជនអំពីតួនាទីរបស់កុងស៊ុលកិត្តិយស គឺការលើកស្ទួយ និងផ្សព្វផ្សាយទេសចរណ៍លើកកម្ពស់ការអប់រំពាណិជ្ជកម្មដែលខ្មែរមានទំនាក់ទំនងជាមួយសហរដ្ឋអាមេរិក។ លោកបានបង្ហាញចំណាប់អារម្មណ៍ថា ខ្មែរនៅឡូវែលមានការប្រកបមុខរបរមានម្ចាស់ជំនួញការរស់នៅសម្បូរបែបមានទាំងវត្តអារាមជាហូរហែ ទោះបីខ្មែរនៅលើទឹកដីអាមេរិក ក៏ប្រកាន់ខ្ជាប់នូវប្បវេណី និងការអនុវត្តគោពសាសនាមានការប្រារព្ធបុណ្យចូលឆ្នាំខ្មែរ និងបុណ្យផ្សេងៗទៀតខ្មែរប្រកាន់បានល្អ។ លោកបន្តលើកទឹកចិត្តឱ្យប្រជាជនខ្មែរនៅបរទេសបន្តចូលរួមគាំទ្រនូវអត្តសញ្ញាណខ្មែរទាំងនេះឱ្យមានអាតិភាព៕




សូបិន បង្ហាញខ្លួនតារាចម្រៀងខ្មែរថ្មីកញ្ញា បញ្ញារី

# គ្លូបូលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

ចំនួនប្រជាជន និងម៉ាស៊ីនពិតប្រាកដពាក់ព័ន្ធមានការពិបាកបាន់ស្មានណាស់ ទោះយ៉ាងណា ក្នុងពាក់កណ្តាលឆ្នាំ ២០០៥ អ្នករស់នៅទីរ៉ងម្នាក់ ដែលមានទំនាក់ទំនងជិតស្និទ្ធជាមួយក្រុមហ៊ុន Seng Keang Company បានប្រាប់ Global Witness ថា មានរណាអារចំនួន ៥២ នៅក្នុងតែឃុំទីរ៉ងមួយគត់[១៥៤] ។ ក្នុងឆ្នាំដូចគ្នានេះ សកម្មជនសហគមន៍ព្រៃឈើបានកត់ត្រាថា មានរណាអារចំនួន ១៣១ និងរោងចក្រចល័ត ១២ នៅក្នុងឃុំទាំងអស់នៃស្រុកសណ្តាន់[១៥៥] ។

### ៤.៤ ការដឹកជញ្ជូន

បុគ្គលិករបស់ក្រុមហ៊ុន Seng Keang Company ម្នាក់ ដែលថាខ្លួនគាត់ជាអ្នកគ្រប់គ្រងការដឹកជញ្ជូនរបស់ក្រុមហ៊ុនបានប្រាប់ Global Witness ក្នុងខែ វិច្ឆិកា ឆ្នាំ ២០០៥ ថា ក្រុមហ៊ុនបានកំពុងប្រើប្រាស់ក្រុមដែលមានឡានប្រាំ និងដឹកឈើពី ៣-៤ ឡាន ចេញពីទីរ៉ងរៀងរាល់ថ្ងៃ[១៥៦] ។ការរាយការណ៍នេះស៊ីគ្នាជាមួយការអង្កេតស្រាវជ្រាវដោយផ្ទាល់របស់ Global Witness ពីសកម្មភាពជុំវិញរោងចក្រអារឈើរបស់ សេង គាង ក្នុងទីរ៉ង ។

ឡានជាច្រើនដែលប្រើប្រាស់ដោយក្រុមហ៊ុន Seng Keang Company ជារបស់កងពលតូចលេខ ៧០ ដែលជាកងយោធាដ៏មានឥទ្ធិពល ដែល សេង កុកហ៊ាង ជានាយយោធា[១៥៧] ។ ការជួយដឹកជញ្ជូនឈើរបស់កងពលតូចលេខ ៧០ គឺជាប្រតិបត្តិការទូទាំងប្រទេស ដែលត្រូវបានរៀបរាប់លំអិតក្នុងជំពូក IV ។ ឡានពណ៌បៃតងយោធាកង់ ១០ របស់កងពល ជាធម្មតាពាក់ផ្លាកលេខកងយោធពលខេមរ-ភូមិន្ទ ហើយជាច្រើនមានផ្លាកលេខ'70' នៅខាងមុខកញ្ចក់ ។ អ្នកស៊ើបអង្កេតរបស់ Global Witness បានតាមដានឡានទាំងនេះ ពីព្រៃឡង់ទៅកាន់រោងចក្រ Kingwood ហើយបានប្រមូលដំណើររឿងពីការសហការរបស់កងឯកភាពនេះ ជាមួយក្រុមហ៊ុន Seng Keang Company ពីទាហានរបស់កងពលតូចលេខ ៧០ ពាណិជ្ជករឈើ និងប្រជាជនក្នុងតំបន់[១៥៨] ។







ឡានដែលស្រដៀងឡានទាំងឡាយ ដែលប្រើប្រាស់ដោយកងពលតូចលេខ ៧០ ដែលដឹកឈើពីទីរ៉ង ទៅកាន់រោងចក្រ Kingwood នាពេលយប់ ឆ្នាំ ២០០៥

### ៤.៥ ទីផ្សារ

ក្រុមហ៊ុន Seng Keang Company ផ្គត់ផ្គង់ឈើពាណិជ្ជកម្ម និងប្រណិតមួយចំនួនដែលខ្លួនកាប់ដោយខុសច្បាប់ក្នុងព្រៃឡង់ទៅកាន់ទីផ្សារក្នុងស្រុករបស់ប្រទេសកម្ពុជា ។ Global Witness បានប្រមូលព័ត៌មានពីប្រភពផ្សេងៗ ដែលនិយាយថា ទោះយ៉ាងណាក៏ដោយចំណែកសំខាន់ជាច្រើន អាចត្រូវបានប្រើប្រាស់នៅខាងក្រៅប្រទេស :

- ការផ្គត់ផ្គង់ឈើពីព្រៃឡង់ ធ្វើឱ្យផលិតកម្មទ្រង់ទ្រាយឧស្សាហកម្មក្តារបន្ទះនៅរោងចក្រ Kingwood អាចបន្តបាន ។ ដូចបានបង្ហាញក្នុងប្រអប់ទី ៨ មានការបង្ហាញជាច្រើន ដែលផលិតផលទាំងនេះភាគច្រើន កំពុងត្រូវបាននាំចេញទៅប្រទេសចិន ។
- ដូចបានរៀបរាប់លំអិតក្នុងជំពូក IV កងពលតូចលេខ ៧០ ពាក់ព័ន្ធយ៉ាងខ្លាំងទៅនឹងការជួញដូរឈើទៅកាន់ប្រទេសវៀតណាម[១៥៩] ។ កងឯកភាពនេះ អាចកំពុងដឹកជញ្ជូនបានយ៉ាងប្រសើរនូវឈើដែលបានកាប់ដោយក្រុមហ៊ុន Seng Keang Company ក្នុងព្រៃឡង់កាត់តាមព្រំប្រទល់ភាគខាងកើតរបស់ប្រទេសកម្ពុជា ។
- ប្រភពដ៏ល្អជាច្រើនបានប្រាប់ Global Witness ឌី ចូច ពាក់ព័ន្ធក្នុងការនាំឈើប្រណិតចេញដោយខុសច្បាប់ក្នុងកុងទ័ន័រនាំចេញតាមកំពង់ផែសមុទ្រភាគខាងត្បូងរបស់ប្រទេសកម្ពុជា[២០០] ។Global Witness បានសរសេរទៅទៅកាន់ ឌី ចូច ក្នុងខែ កុម្ភៈ ឆ្នាំ ២០០៧ ដើម្បីសុំយោបល់របស់គាត់ចំពោះការចោទប្រកាន់នេះ ប៉ុន្តែមិនបានទទួលការឆ្លើយតបទេ ។



ក្រុមហ៊ុន Seng Keang Company ផ្គត់ផ្គង់ឈើប្រណីតឱ្យទីផ្សារក្នុងស្រុករបស់ប្រទេសកម្ពុជា និងក្រៅប្រទេស

តនៅលេខក្រោយ

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី២៦ ខែកក្កដា ឆ្នាំ២០១៣

# ការប្រឹងប្រែងនៅនាទីចុងក្រោយរបស់លោក សម រង្ស៊ី ដើម្បីសុំពលភាពសមាជិកសភាត្រូវបានបដិសេធ

**គុច ណារ៉េន និង Alex Willemyns**
**ខេមបូឌា ដេលី**

ទាំងរដ្ឋសភាព និងក្រុមប្រឹក្សារដ្ឋធម្មនុញ្ញនៃប្រទេសកម្ពុជា គឺជាស្ថាប័នច្បាប់កំពូលក្នុងប្រទេសបានកោះប្រជុំសម្ងាត់កាលពីម្សិលមិញ ដែលអំឡុងពេលប្រជុំនោះ ពួកគេបានសម្រេចមិនផ្តល់សិទ្ធិដល់លោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងឱ្យបានបោះឆ្នោត និងជាបេក្ខជនតំណាងរាស្ត្រសម្រាប់ការបោះឆ្នោតនៅថ្ងៃអាទិត្យនេះទេ ។

យោងតាមបទថតចម្លងនៃលិខិតដែលទទួលបានកាលពីម្សិលមិញជូនលោក សម រង្ស៊ី ដែលចុះហត្ថលេខាដោយលោក ហេង សំរិន ប្រធានរដ្ឋសភានោះ គណៈកម្មាធិការអចិន្ត្រៃយ៍នៃរដ្ឋសភាបានបើកកិច្ចប្រជុំមួយ ដើម្បីពិភាក្សាសំណើររបស់លោក សម រង្ស៊ី កាលពីថ្ងៃអង្គារសុំឱ្យផ្តល់សុពលភាពសមាជិកសភាដល់លោកវិញឱ្យបានមុនការបោះឆ្នោតនេះ ។

លិខិតនោះលើកឡើងថា "គណៈកម្មាធិការអចិន្ត្រៃយ៍បានសម្រេចជាឯកច្ឆ័ន្ទថា ដោយហេតុឯកឧត្តមបានក្លាយជាប្រធានគណបក្សសង្គ្រោះជាតិជាគណបក្សដែលពុំមានអាសនៈក្នុងរដ្ឋសភានីតិកាលទី៤នេះ គណៈកម្មាធិការអចិន្ត្រៃយ៍នៃរដ្ឋសភាពុំអាចផ្តល់សុពលភាពអភ័យឯកសិទ្ធិ និងបុព្វសិទ្ធិជូនឯកឧត្តមវិញបានទេ" ។

តំណែងសមាជិកសភារបស់លោក សម រង្ស៊ី សម្រាប់គណបក្ស សម រង្ស៊ី នៅទំនេរបន្ទាប់ពីលោកបានភៀសខ្លួនចេញពីប្រទេស ដើម្បីគេចវេសពីទោសជាប់ពន្ធនាគារ១១ឆ្នាំ កាលពីឆ្នាំ ២០០៩ តាមបទចោទប្រកាន់ដែលអ្នករិះគន់និយាយថា ជារឿងនយោបាយ ។

ចាប់តាំងពីពេលនោះមកគណបក្ស សម រង្ស៊ី បានរួមបញ្ចូលគ្នាជាមួយគណបក្សសិទ្ធិមនុស្ស ដើម្បីបង្កើតគណបក្សសង្គ្រោះជាតិដែលជាហេតុនាំឱ្យគណៈកម្មាធិការអចិន្ត្រៃយ៍នៃរដ្ឋសភាដកតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិចំនួន២៧រូបចេញពីរដ្ឋសភាកាលពីដើមឆ្នាំនេះ ។

អ្នកជំនាញច្បាប់និយាយថា ឥឡូវនេះសេចក្តីសម្រេចនេះមានន័យថា មិនមានសមាជិកសភាគណបក្សប្រឆាំងណាម្នាក់មានតំណែងនៅក្នុងរដ្ឋសភាទេ ដូច្នេះហើយ ដើម្បីឱ្យលោក សម រង្ស៊ី ទទួលបានតួនាទីរបស់លោកវិញ មានន័យថា លោកត្រូវលាលែងពីប្រធានគណបក្សសង្គ្រោះជាតិ និងចូលរួមជាមួយគណបក្ស សម រង្ស៊ី វិញ ។

លិខិតរបស់លោក សម រង្ស៊ី ផ្ញើជូនលោក ហេង សំរិន ដើម្បីស្នើសុំឱ្យផ្តល់តួនាទីជាសមាជិកសភាដល់លោកវិញនោះ គឺជាកិច្ចខំប្រឹងប្រែងចុងក្រោយ ដើម្បីឱ្យលោកបានឈរឈ្មោះជាបេក្ខជនតំណាងរាស្ត្រនៅក្នុងការបោះឆ្នោតនៅថ្ងៃអាទិត្យនេះ ។

កាលពីម្សិលមិញក្រុមប្រឹក្សាធម្មនុញ្ញក៏បានបើកកិច្ចប្រជុំពេញអង្គមួយដែរ ដើម្បីពិភាក្សាពីសំណើររបស់លោក សម រង្ស៊ី ដែលបានដាក់ជូនក្រុមប្រឹក្សាធម្មនុញ្ញសុំឱ្យលោកមានឈ្មោះបោះឆ្នោត និងអនុញ្ញាតឱ្យលោកបានឈរឈ្មោះជាបេក្ខជននៅក្នុងការបោះឆ្នោតនេះវិញ ។

លោក អ៊ុត ឈន អ្នកនាំពាក្យក្រុមប្រឹក្សាធម្មនុញ្ញបានមានប្រសាសន៍ថា សេចក្តីសម្រេចនេះត្រូវបានធ្វើឡើង បន្ទាប់ពីក្រុមប្រឹក្សាធម្មនុញ្ញបានពិនិត្យច្បាប់ស្តីពីការរៀបចំ និងការប្រព្រឹត្តទៅនៃក្រុមប្រឹក្សាធម្មនុញ្ញ និងវិសោធនកម្មនៃច្បាប់នេះ ហើយមិនអាចរកឃើញមាត្រាណាមួយដែលអាចអនុញ្ញាឱ្យលោក សម រង្ស៊ី បានឈរឈ្មោះជាបេក្ខជនសម្រាប់ការបោះឆ្នោតនេះបានទេ ។

លោកបានមានប្រសាសន៍ថា "ផ្នែក៣ នៃជំពូក២របស់ច្បាប់នេះ គឺមានសារៈសំខាន់បំផុតពីព្រោះវានិយាយអំពីសមត្ថកិច្ចរបស់ក្រុមប្រឹក្សាធម្មនុញ្ញពាក់ព័ន្ធនឹងការបោះឆ្នោតជ្រើសរើសតំណាងរាស្ត្រ ។ នៅព្រឹកនេះសមាជិកក្រុមប្រឹក្សាធម្មនុញ្ញបានត្រួតពិនិត្យគ្រប់មាត្រាទាំងអស់នៅក្នុងច្បាប់នេះ ប៉ុន្តែមិនមានចែងពី"មាត្រាបែបនេះ"ទាល់តែសោះ ដូច្នេះយើងបានសម្រេចថាករណីនេះមិនស្ថិតក្នុងសមត្ថកិច្ចរបស់ក្រុមប្រឹក្សាធម្មនុញ្ញនោះទេ" ។

លោក អ៊ុត ឈន បានថ្លែងថា សេចក្តីសម្រេចនេះមិនមែនជារឿងនយោបាយទេ ហើយក្រុមប្រឹក្សារដ្ឋធម្មនុញ្ញ គឺជា"ស្ថាប័នឯករាជ្យ និងអព្យាក្រឹត្យ"ដោយគ្រាន់តែបំពេញតួនាទីរបសខ្លួនទៅតាមការស្នើសុំប៉ុណ្ណោះ ។

បន្ទាប់ពីបានដឹងពីសេចក្តីសម្រេចនេះ កាលពីម្សិលមិញលោក សម រង្ស៊ី បានមានប្រសាសន៍ថា នេះគឺជាការបង្ហាញពីការភ័យខ្លាចរបស់គណបក្សកាន់អំណាច ។

លោកបានមានប្រសាសន៍ថា "កាលពីឆ្នាំ ២០០៦ នៅពេលខ្ញុំត្រូវបានលើកលែងទោសខ្ញុំបានទទួលបុព្វសិទ្ធិរបស់ខ្ញុំទាំងអស់មកវិញ ប៉ុន្តែពេលនេះពួកគេបានធ្វើផ្សេងទៅវិញ ដូច្នេះខ្ញុំគិតថា នេះបង្ហាញថា ពួកគេខ្លាចគណបក្សសង្គ្រោះជាតិ ។ ធ្វើឱ្យគេមានការ **តទៅទំព័រទី១៥**

# Sam Rainsy's Last-Minute Efforts to Run Rebuffed

**By Kuch Naren and Alex Willemyns**
**The Cambodia Daily**

Both the National Assembly and the Constitutional Council of Cambodia, the highest legal authority in the land, convened close-door meetings yesterday reinstate opposition leader Sam Rainsy as voter and parliamentary candidate for Sunday's national election.

According to copy of letter to send yesterday to Mr. Rainsy and signed by national Assembly President Heng Samrin, the National Assembly's Permanent Committee held a meeting to discuss a request made by Mr. Rainsy on Tuesday that he be reinstalled as a lawmaker before the election.

"The Permanent committee unanimously decided that because Your Excellency has become president of the Cambodia National Rescue Party [CNRP], which doesn't have any seats in the fourth mandate of the National Assembly, the Permanent Committee cannot offer validity, immunity and privilege for Your Excellency," the letter says.

Mr. Rainsy's seat as lawmaker for Sam Rainsy Party (SRP) remained vacant after he fled the country to avoid an 11-year prison sentence in 2009 on charges that critics say were politically motivated.

Since then, the SRP has merged with the Human Rights Party to form the CNRP, a move which led the national committee to strip 27 CNRP representatives of their parliamentary seats earlier this year.

Legal experts say that decision now means that no member of the opposition has lawmaker status, and so for Mr. Rainsy to regain his position would mean resigning as NCRP president and rejoining the now defunct SRP.

Mr. Rainsy's letter to Mr. Samrin asking to be reinstated as a lawmaker was somewhat of last ditch effort to allow him to run as a candidate in Sunday's election.

The Constitutional Council of Cambodia yesterday also held a special plenary meeting to discuss Mr. Rainsy's request to the body on Wednesday to reinstate his registration on the voter list and allow him to run as a candidate in the ballot.

President over by Constitutional Council President Ek Sam Ol, the body concluded in its meeting that Mr. Rainsy's request was "not under the jurisdiction of the Constitutional Council of Cambodia," according to a letter it send to Mr. Rainsy yesterday.

Constitutional Council spokesman Uth Chhorn said the decision was made after the body examined the Law on the Organizing and Functioning of the Constitution Council and it's amendments, and could not find a provision under which it could reinstate Mr. Rainsy as a candidate for Sunday's election.

"Section 3 [of Chapter 2 of the Law] is the most important because it talks about the competences of the Constitutional Council relating to election of members to the National Assembly," he said. "This morning, members of the Constitutional Council reviewed all documents [in the law] but [such a provision] is not mentioned at all, so we concluded that this case is not under the jurisdiction of the Constitutional Council."

Mr. Chhorn said the decision was not politically motive, and that the Constitutional Council was "a neutral and independent institutional " simply exercising its functions as called upon to do.

After learning about the decisions yesterday, Mr. Rainsy said it only went to show how fearful the ruling CPP is of and upset on Sunday.

"in 2006 when I was pardoned, I got all my privileges back, but this time they have done it differently, so I think this show they are every frightened of the CNRP," he said.

"The legitimacy of the election was already called into question. I think this is now the last straw that breaks the camel's back."

"What is an election where a prime minister does not face a challenger? I think the whole world will laugh when he says he is the victor of the election," he added.

CNRP spokesman Yim Sovann also claimed yesterday that the two decisions against Mr. Rainsy would inevitably call into question the legitimacy of the results of Sunday's election. "The elections will not be free and fair at all," he said. "Of the 18 points of recommendation given by [U.N. human rights envoy] Mr. Surya Subedi, not even one has implemented."

Mr. Sovann was referring to a report released last July by Mr. Subedi that called for major reform within the National Election Committee as well as the return of Mr. Rainsy to ensure "a level playing field for all political parties to compete on an equal footing."

"Only half point has been implemented because Mr. Sam Rainsy has only been allowed to return, but not allowed to run in the election," Mr. Sovann said. "I would ask the government: Do they want the election to be free and fair, do they want the upcoming government to be legitimate?"

Council of Ministers spokesman Phay Siphan defended the decisions and said they had been made according to "due process."

"A lot of people complain the election will not be free or fair because of one person. There is 14 million more people in Cambodia and everybody is equally important under the law," he said .

"Sam Rainsy is just one person; he's a regular person."

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសែតអង់គ្លេស អគ្គបនាធិការស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី២៦ ខែកក្កដា ឆ្នាំ២០១៣

# អ្នកបាត់ឈ្មោះអស់សង្ឃឹមពេលការបោះឆ្នោតខិតជិតមកដល់

**កាំង ម៉េងហ៊ុន និង Zsombor Petter**

**ខេមបូឌា ដេលី**

លោក យឹម វិរ័ត្តិ តែងតែបោះឆ្នោតនៅការិយាល័យបោះឆ្នោតដដែលក្នុងខណ្ឌ៧មករា រាជធានីភ្នំពេញ ចាប់តាំងពីឆ្នាំ២០០៣មក ។ លោកមិនដែលផ្លាស់ទីលំនៅទេ ហើយមានឈ្មោះបោះឆ្នោតនៅការិយាល័យបោះឆ្នោតដដែលនេះរាល់លើក គឺនៅការិយាល័យលេខ៣៥១ ។ ប៉ុន្តែនៅពេលបុរសវ័យ៣៥ឆ្នាំរូបនេះស្វែងរកឈ្មោះរបស់ខ្លួននៅលើច្បាប់ចម្លងនៃបញ្ជីឈ្មោះបោះឆ្នោតដែលគឺបជាប់នឹងក្តារបិទប្រកាសមួយនៅខាងក្រៅសាលាសង្កាត់វាលវង់ កាលពីពីរថ្ងៃមុន លោករកឈ្មោះរបស់ខ្លួនមិនឃើញទេ ។

លោកបាននិយាយបន្ទាប់ពីពិនិត្យរកឈ្មោះរបស់លោកម្តងហើយម្តងទៀតអស់កន្លះម៉ោងថា ខ្ញុំព្រួយបារម្ភខ្លាចមិនអាចបោះឆ្នោតបាន ។ នៅពេលខ្ញុំប្រាប់ពួកគេ"មន្ត្រីសង្កាត់"ពួកគេគ្រាន់តែប្រាប់ខ្ញុំថាឱ្យរកមើលម្តងទៀត ។ ប៉ុន្តែខ្ញុំបានរកមើលម្តងហើយម្តងទៀត ហើយខ្ញុំនៅតែរកមិនឃើញ" ។

បញ្ហានេះមិនដែលកើតមានឡើងតែចំពោះលោក យឹម វិរ័ត្តិ ម្នាក់ឯងនោះទេ ។

យោងតាមសវនកម្មឯករាជ្យមួយលើបញ្ជីឈ្មោះបោះឆ្នោតរបស់រដ្ឋាភិបាលសម្រាប់ការបោះឆ្នោតនៅថ្ងៃអាទិត្យនេះបង្ហាញថា ប្រជាពលរដ្ឋមានសិទ្ធិបោះឆ្នោតចំនួន១០,៨% ដែលគិតថា ខ្លួនមានឈ្មោះក្នុងបញ្ជីឈ្មោះបោះឆ្នោតនោះតាមពិតអត់មានទេ ៧,៨% នៃអ្នកដែលបានធ្លាប់បោះឆ្នោតនៅក្នុងការបោះឆ្នោតជាតិក្នុងឆ្នាំ២០០៨គ្មានឈ្មោះនៅក្នុងបញ្ជីឈ្មោះបោះឆ្នោតទៀតទេ ហើយ៩,៤% នៃអ្នកដែលត្រូវបានលុបឈ្មោះចេញពីបញ្ជីឈ្មោះបោះឆ្នោតនៅឆ្នាំនេះ ត្រូវបានលុបចេញដោយមិនត្រឹមត្រូវ ។ សវនកម្មនេះបានបង្ហាញថា ឈ្មោះមួយក្នុងចំណោមឈ្មោះអ្នកបោះឆ្នោតចំនួន១០០នាក់ប្រហែលជាមិនមានមនុស្សពិតប្រាកដផងទេ ជាហេតុបណ្តាលឱ្យមានការព្រួយបារម្ភអំពីចំនួនយ៉ាងច្រើននៃ"អ្នកបោះឆ្នោតខ្មោច" ។

សវនកម្មឯករាជ្យមួយទៀតបានសន្និដ្ឋានថា ប្រជាពលរដ្ឋកម្ពុជារហូតដល់ទៅ១,២៥លាននាក់អាចនឹងបាត់បង់សិទ្ធិបោះឆ្នោតរបស់ខ្លួននៅថ្ងៃអាទិត្យនេះ ហើយបានព្រមានថា នេះអាចជាការបោះឆ្នោតដែលមានភាពយុត្តិធម៌តិចតួចបំផុតក្នុងប្រទេសកម្ពុជាក្នុងរយៈពេល២០ឆ្នាំមកនេះ ។

គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតហៅកាត់ថា គជប បានច្រានចោលសវនកម្មទាំងនេះ ទោះបីជាសវនកម្មផ្ទាល់របស់ខ្លួនស្រដៀងគ្នាច្រើនទៅនឹងលទ្ធផលដដែលនេះក៏ដោយ ។ ប៉ុន្តែនៅទូទាំងរាជធានីភ្នំពេញនាសប្តាហ៍នេះ អ្នកបោះឆ្នោតមួយចំនួនដែលពោរពេញដោយក្តីសង្ឃឹមដែលបានពិនិត្យមើលបញ្ជីឈ្មោះនៅតាមសង្កាត់របស់ខ្លួននៅនាទីចុងក្រោយនៅតែរកឈ្មោះរបស់ខ្លួនមិនឃើញ ។

លោក យឹម វិរ័ត្តិ បាននិយាយមុននៅពេលបោះបង់ការរកឈ្មោះរបស់ខ្លួននៅទីបំផុតថា "កត្តានេះនឹងធ្វើឱ្យប៉ះពាល់ដល់លទ្ធផលនៃការបោះឆ្នោតពីព្រោះវាធ្វើឱ្យបាត់សន្លឹកឆ្នោត" ។

នៅផ្នែកម្ខាងទៀតនៃក្តារបិទប្រកាសដដែលនេះ ស្ត្រីម្នាក់ឈ្មោះ ស្រី បញ្ញា ក៏ជួបរឿងដូចគ្នានេះដែរ ។ ស្ត្រីរូបនេះនិយាយថា "ខ្ញុំបានរង់ចាំពិនិត្យមើលបញ្ជីឈ្មោះជាយូរមកហើយ ពីព្រោះខ្ញុំមិនដែលមានបញ្ហាពីមុនមកទេ ។ ខ្ញុំតែងបោះឆ្នោតនៅការិយាល័យបោះឆ្នោតលេខ៣៦៨ ចាប់តាំងពីឆ្នាំ១៩៩៨មក" ។

បន្ទាប់ពីពិនិត្យមើលបញ្ជីឈ្មោះបោះឆ្នោតទាំងអស់នៅសាលាសង្កាត់នេះម្តងហើយម្តងទៀត ស្ត្រីរូបនេះក៏បានដើរចេញដោយរកឈ្មោះរបស់ខ្លួនមិនឃើញដូចគ្នាដែរ ។

នៅខាងក្នុងការិយាល័យដ៏តូចចង្អៀតរបស់ខ្លួនលោក ជុំ យឿន ស្មៀនសង្កាត់បានអះអាងថា រហូតមកទល់ពេលនេះមិនទាន់មាននរណាម្នាក់ដែលថា រកឈ្មោះរបស់ខ្លួនមិនឃើញនោះទេ ។

លោកបានមានប្រសាសន៍ថា "យើងមិនទាន់មានអ្នកដែលរកឈ្មោះរបស់ខ្លួនមិនឃើញនៅឡើយទេ ។ ប្រសិនបើពួកគាត់មិនបានផ្លាស់ទីលំនៅទេនោះ យើងអាចរកឈ្មោះរបស់ពួកគាត់ឃើញរហូត ។ ប្រសិនបើពួកគាត់រកមិនឃើញ យើងនឹងជួយពួកគាត់" ។

លោកបានលើកឡើងថា សម្រាប់អ្នកដែលមានបញ្ហា ពួកគាត់ត្រឡប់មកវិញជាមួយនឹងឯកសារសម្គាល់អត្តសញ្ញាណទាំងអស់របស់ខ្លួន ហើយឱ្យកូនប្រុស ឬកូនស្រីជួយពិនិត្យមើលបញ្ជីឈ្មោះឱ្យពួកគេគាត់ ។

នៅឯសាលាបឋមសិក្សាភ្នំពេញថ្មី ខណ្ឌសែនសុខ ដែលជាខណ្ឌថ្មីបំផុតមួយក្នុងរាជធានីភ្នំពេញលោក ជា ផាត គ្មានបញ្ហាអ្វីក្នុងការស្វែងរកឈ្មោះរបស់ខ្លួនក្នុងបញ្ជីឈ្មោះបោះឆ្នោតដែលត្រូវបានបិទភ្ជាប់ទៅនឹងទ្វារបង្អួចនៃថ្នាក់រៀនទំនេរមួយឡើយ ។ **តទៅទំព័រទី ១៤**

# លោក កឹម សុខា សម្តែងការព្រួយបារម្ភ

## ចំពោះអំពើហឹង្សាក្រោយការបោះឆ្នោតប្រាប់តំណាង អ.ស.ប

**ហ៊ុល រស្មី និង Simon Lewis**

កាលពីម្សិលមិញលោក កឹម សុខា អនុប្រធានគណបក្សប្រឆាំងបានមានប្រសាសន៍ថា លោកមិនអាចធានាថា នឹងគ្មានអំពើហឹង្សាក្រោយការបោះឆ្នោតនៅថ្ងៃអាទិត្យបានទេ ហើយបានអំពាវនាវឱ្យសហគមន៍អន្តរជាតិប្រុងជើងការ និងជួយធានាឱ្យបាននូវអន្តរកាលមួយដោយសន្តិវិធីបន្ទាប់ពីចេញផ្សាយលទ្ធផលនៃការបោះឆ្នោត ។

ថ្លែងទៅកាន់ក្រុមអ្នកយកព័ត៌មាន បន្ទាប់ពីជួបជាមួយតំណាងមួយរូបមកពីភ្នាក់ងារសិទ្ធិមនុស្សរបស់អង្គការសហប្រជាជាតិ(អ.ស.ប)នៅទីស្នាក់កណ្តាលរាជធានីភ្នំពេញលោក កឹម សុខា ថ្លែងថា លោកបានសម្តែងការព្រួយបារម្ភថា បរិយាកាសឆ្ពោះទៅថ្ងៃផ្តាច់ព្រ័ត្រនៃការធ្វើយុទ្ធនាការឃោសនាបោះឆ្នោតមានភាពតានតឹង ហើយអាចនឹងមានភាពចលាចលយ៉ាងងាយ ប្រសិនបើលទ្ធផលនៃការបោះឆ្នោតមិនត្រូវបានទទួលស្គាល់ជាផ្លូវការ ។

លោក កឹម សុខា បានមានប្រសាសន៍ថា "ប្រសិនបើគណបក្សសង្គ្រោះជាតិឈ្នះយើងមិនដឹងថា គណបក្សប្រជាជនកម្ពុជានឹងមានប្រតិកម្មអ្វីនោះទេ ហើយប្រសិនបើគណបក្សប្រជាជនកម្ពុជាឈ្នះវិញ យើងក៏មិនដឹងថា អ្នកគាំទ្រគណបក្សសង្គ្រោះជាតិនឹងមានប្រតិកម្មអ្វីនោះដែរ" ។

ដោយសារតែស្ថានភាពមិនច្បាស់លាស់បែបនេះ លោក កឹម សុខា បានមានប្រសាសន៍ថា អង្គការសហប្រជាជាតិ និងប្រទេសចំនួន១៨ រួមទាំងសហរដ្ឋអាមេរិក ចិន បារាំង និងជប៉ុនផង ដែលបានពិនិត្យមើលកិច្ចព្រមព្រៀងសន្តិភាពក្រុងប៉ារីសឆ្នាំ១៩៩១ ដែលបានបញ្ចប់សង្គ្រាមរាប់ទសវត្សរ៍ក្នុងប្រទេសកម្ពុជានោះ គួរតែត្រៀមខ្លួនឱ្យហើយដើម្បីធានាឱ្យបាននូវសន្តិភាពជាថ្មីម្តងទៀត បន្ទាប់ពីការបោះឆ្នោត ។

សំដៅដល់កិច្ចព្រមព្រៀងក្រុងប៉ារីសដែលបានផ្តួចផ្តើមឱ្យមានបេសកម្មរក្សាសន្តិភាពរបស់អង្គការសហប្រជាជាតិដែលបានពិនិត្យមើលការបោះឆ្នោតជាតិឆ្នាំ១៩៩៣ លោកបានមានប្រសាសន៍ថា "ខ្ញុំសូមអំពាវនាវឱ្យបណ្តាហត្ថលេខីនៃកិច្ចព្រមព្រៀងសន្តិភាពទីក្រុងប៉ារីសត្រៀមខ្លួនមកធ្វើជាអ្នកសម្រុះសម្រួល និងសង្កេតការណ៍ ពីព្រោះខ្ញុំគិតថា ការបោះឆ្នោតនៅឆ្នាំនេះមានភាពស្មិតស្មាញខ្លាំងណាស់ " ។

លោក កឹម សុខា បានវិលត្រឡប់មករាជធានីភ្នំពេញវិញ អំឡុងដំណើរចុះឃោសនាយ៉ាងប្រញាប់ប្រញាល់នៅតាមបណ្តាខេត្ត ហើយបានជួបជាមួយតំណាងអង្គការសហប្រជាជាតិ ដើម្បីសម្តែងការព្រួយបារម្ភអំពីការកើតមានអំពើហិង្សាមុនការបោះឆ្នោតក្នុងពេលថ្មីៗនេះ ។

ទោះបីជាសេចក្តីរាយការណ៍អំពីការប៉ះទង្គិចគ្នាក្នុងពេលថ្មីៗនេះបានលើកឡើងថា អ្នកគាំទ្រគណបក្សប្រឆាំងបានធ្វើឱ្យអ្នកគាំទ្រគណបក្សប្រជាជនកម្ពុជាខឹងដោយសារតែការប្រើវោហាស័ព្ទប្រឆាំងវៀតណាម ជាពិសេសតាមរយៈការប្រើប្រាស់ពាក្យថា "យួន" ក៏ដោយក៏លោក កឹម សុខា បានអះអាងថា គណបក្សសង្គ្រោះជាតិ និងរកដំណោះស្រាយអហិង្សាទាក់ទិនលទ្ធផលបោះឆ្នោត ។

លោកបានមានប្រសាសន៍ថា "ជាដំបូងយើងនឹងរង់ចាំមើលសិនថា តើលទ្ធផលនៃការបោះឆ្នោតត្រឹមត្រូវកំរិតណា និងថា តើលទ្ធផលពិតជាមិនត្រឹមត្រូវ ឬយ៉ាងណាយើងនឹងពិចារណារកវិធីតវ៉ា ។ យើងនឹងតវ៉ាដោយអហិង្សា គឺមិនប្រើអំពើហិង្សាឡើយ យើងចង់ឃើញដំណោះស្រាយមួយដែលភាគីទាំងអស់អាចទទួលយកបាន" ។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីថ្លែងថា លោកមិនអាចព្យាករណ៍បានថា នឹងមានអ្វីកើតឡើងបន្ទាប់ពីការបោះឆ្នោតនោះទេ ប៉ុន្តែលោកលើកឡើងថា គណបក្សទាំងអស់ត្រូវតែទទួលស្គាល់ការសម្រេចចិត្តរបស់អ្នកបោះឆ្នោត ។

លោកបានមានប្រសាសន៍ថា "យើងត្រូវតែគោរពការជ្រើសរើសរបស់ប្រជាពលរដ្ឋភាគច្រើន ។ យើងកំពុងនិយាយអំពីនីតិរដ្ឋ ។ យើងកំពុងនិយាយអំពីលទ្ធិប្រជាធិបតេយ្យ ។ នេះជាមូលហេតុដែលយើងរៀបចំការបោះឆ្នោត វាមិនមានន័យថា យើងបែកបាក់សាមគ្គីទេ ។ យើងគ្មានការរំពឹងទុកណាមួយចំពោះលទ្ធផលនៃការបោះឆ្នោតនោះទេ ។ វាជាការជ្រើសរើសរបស់ប្រជាពលរដ្ឋ ហើយច្បាប់នឹងត្រូវអនុវត្តលើជនណាដែលព្យាយាមបង្កបញ្ហា "បន្ទាប់ពីចេញលទ្ធផលនៃការបោះឆ្នោត" ។

លោកមានប្រសាសន៍ថា ពិធីជួបជុំមហាជនដើម្បីសម្តែងការគាំទ្រចំពោះគណបក្សសង្គ្រោះជាតិធ្វើឡើងនៅទូទាំងប្រទេសបានបង្ហាញថា ការបោះឆ្នោតត្រូវធ្វើឡើងក្នុងបរិយាកាសសេរី ។ លោកមានប្រសាសន៍ទៀតថា "គណបក្សប្រឆាំងមានផែនការប្រឌិតរឿងដើម្បីបង្ហាញថា លទ្ធផលបោះឆ្នោតគួរឱ្យខកចិត្ត "ចំពោះប្រជាពលរដ្ឋ" ។

លោក កឹម សុខា បានមានប្រសាសន៍ថា លោកបានដាក់សំណើរទៅតំណាងការិយាល័យឧត្តមស្នងការទទួលបន្ទុក **តទៅទំព័រទី ១៦**

# ពីភ្នំពេញទៅឡូវែលៈ ជីវិតប្រចាំថ្ងៃរបស់និស្សិតពីកម្ពុជា

## ទូច វ៉ាន់ ៖ ទំនុកចិត្តលើខ្លួនឯង និងការព្យាយាមនាំមកនូវជោគជ័យ

**ដោយៈ ខ្មែរផុស ស.រ.អា**

"Yes We Can" ឬ យេស វី ខេន ជាភាសាខ្មែរមានន័យថា យើងអាចធ្វើបាន ។ ពាក្យបីម៉ាត់នេះ ធ្វើឱ្យ បារ៉ាក់ អូបាម៉ា ក្លាយជាប្រធានាធិបតីនៃសហរដ្ឋអាមេរិកទី៤៤ និងជាប់ឆ្នោតពីរលើកជាប់គ្នាក្នុងអណត្តិឆ្នាំ២០០៩ម្តង និងឆ្នាំ២០១២ម្តងទៀត។ ស្របគ្នានឹងអត្ថន័យនៃកសាងទំនុកចិត្តនេះលោក ទូច វ៉ាន់ ដែលជាជនកូនខ្មែរមួយរូបកំព្រាឪពុកម្តាយ និងព្រាត់ប្រាស់បងប្អូននៅអាយុ៥ឆ្នាំបានស្វែងរកជ្រកកោនជាមួយឪពុកម្តាយចិញ្ចឹមតស៊ូរៀនដោយជឿថា អាចធ្វើឱ្យជីវិតប្រសើរបាន។ លោក ទូច វ៉ាន់ ទទួលបានឱកាសមករៀននៅសហរដ្ឋអាមេរិកនៅឆ្នាំ១៩៩៦ ហើយបញ្ចប់បរិញ្ញាប័ត្ររងពីសាកលវិទ្យាល័យសម្រាប់សហគមន៍មីុដដលសិុកបន្តយកបរិញ្ញាប័ត្រផ្នែកការសិក្សាអន្តរជាតិអំពីមនុស្សធម៌និងយុត្តិធម៌សង្គមពីមហាវិទ្យាល័យទ្រីនីធី ព្រមទាំងសញ្ញាប័ត្រពីសាលាវូដជ្រូវីលសិនផ្នែកគោលការណ៍សាធារណៈ និងវិស័យអន្តរជាតិនៅសាកលវិទ្យាល័យព្រីនស័តុនរួមជាមួយនឹងសញ្ញាប័ត្រអនុបណ្ឌិតពីសាលាច្បាប់និងវិស័យការទូត ហ្វ្លិតឆឺពីសាកលវិទ្យាល័យធីហ្វធ័ស៍ ៕

# FROM PHNOM PENH TO LOWELL: A JOURNEY OF THE INTERNATIONAL student from Cambodia: This I believe I can learn

**By Toch Van**



When I was about five years old, I was left alone in this world to fend for myself.The Khmer Rouge soldiers took my parents and nine of siblings to be killed after they found out my father was a university professor. I moved from one foster family to the next in search of a refuge. Often I was beat up and emotionally abused by the foster family after the genocide. In that process, I believed I learned how to cultivate survival skills to live and to move on in life.

At 15 years old, a classmate of mine who asked me to tutor him and four other kids in math in exchanging for food and a place to stay. I learned to be a tutor. With this opportunity, I believed I learned how to put the education into practice. I started to realize that if I only worked hard and determined, I could use my education to get out from the poverty as well as to help others so much.

In 1995, I met Frank Falcetta, former Associate Provost of Middlesex Community College. He was in Cambodia to search for a candidate who deserve a scholarship to study at Middlesex. A number of Cambodian politicians tried to persuade Frank to take their daughter or son. Frank did not listen to them. But my name was recommended to him. Over the dinner, Frank asked me,

"Did you know how to write in English--"

I answered… "I did not know but I could learn …. " Frank smiled & said nothing at that moment.

I thought to myself "Tooch!!! You screwed up… & you should to tell him… you know how to write English." The sense of shamefulness danced in my mind.

However, at the end of the dinner, Frank gave me his business card and told me to write him an essay… "why did I want to come and study in America.."

A year later, I received a scholarship to study at Middlesex Community College.

My dream came true to finally see America. I had many difficulties due to my English and to cultural barriers. I did not know how to write and read in English properly. I did not know how to analyze or put things together as a project.

Culturally, I could not understand most of what people said and did here,

particularly American jokes and sarcasms. In classroom, whenever the teacher told a joke sometimes, the entire classed laughed out about but I could not understand what they were laughed about….

But through hard work, determination, and a bit of luck, I managed to graduate from Middlesex Community College, went on to get my BA in International Studies and minus in Humanitarian and Social Justice from Trinity College and a Certificate from the Woodrow Wilson School of Public Policy and International Affairs at Princeton University, and a Master from the Fletcher School of Law and Diplomacy at Tufts University…. You can see, I believed I could learn how to get the college degrees here in America.

To fast forward my story, these days, everyday is a gift for me that I am surrounded by educators and friends at work and at home. At Middlesex Community College, I have learned to work with my colleagues professionally to teach and empower our students to take pride in their own learning as well as to try their best to reach their potentials in life. Also, I am learning how to give compliments to my female colleagues in the office in an appropriate way without viewing as a sexual harassment, biases or anything. In Cambodian culture, a man never or barely gives a compliment to a woman. But I believe I can learn to do this.

At home, I am learning to be a good husband and father. I have learned that is okay if I sometimes lose in negotiations to my wife. In Cambodian culture, while is a male oriented society, a man always gets his way. I grew up in that culture.

Sometimes, it has been very challenging for me to hear when my wife says, "No" to what I want. For example, it has been always been a dream of mine to have a big family. So I have been negotiating with my wife, using all negotiation skills that I learned from the Fletcher School Law and Diplomacy with her.

The proposal was to have four kids, so they could play together in a big, fat and happy family.

But my wife said "no way"… she continued.. two are enough for you …

So it is very difficult to accept it,

But I believed I learned to accept the answer "NO" from my wife.

Let's me close with an anecdote about my four years old, son Winston Van

we (my wife and I) have been trained him: whenever he coughs or sneezes, he should cover his mouth with his army. Boy! This four years old kid came up after

me: every time, I coughed and I forgot to cover my mouth. He keeps reminding

everybody in the house and our guests including my wife's uncle visiting from France (that was a story behind that, too).

Another tale of Winston is when he turned 4 four in April 28, he walked around and told everybody in his preschool including teachers. My birthday is today and my dad & mom will have my birthday celebration for me.

One of his teachers asked. "How old you are"?

Winston replied "I am four"

Teacher continued asking "how old is your dad"

Winston replied "He is four and half." You can see, Winston is not afraid to take risk in his life at all. I personally always encourage and support Winston's initiation, courage and creativity. With these opportunities, I believe Winston one day, will come up with his own original and authentic idea how on to live his life rightly.

My life is a journey where my struggles & triumphs become a personal power to a life full of countless learning opportunities. And my educational journey has empowered me to learn how to navigate my life with ability, integrity, creativity, as well as a moral responsibility to see the world and how it runs.

@Tooch A.Van

តមកទំព័រទី ១

## ពិធីសម្ពោធការិយាល័យខ្មែរផុស...

នាឱកាសកាត់ខ្សែបូរជានិមិត្តរូបនៃការផ្តើមសកម្មភាពកាសែតខ្មែរដ៏តូចមួយនេះ លោក ប៉ាទ្រីក ម័រហ្វី អភិបាលក្រុងឡូវែល បានសម្តែងការលើកទឹកចិត្តដ៏ខ្ពង់ខ្ពស់ដល់បុគ្គលិកខ្មែរផុសហើយអានសញ្ញាប័ត្តកោតសរសើរមួយដែលចេញពីសាលាក្រុងជូនដល់ស្ថាប័នកាសែតដែលបានមកឈរជើងប្រកបមុខរបរបំរើវិស័យព័ត៌មានសាធារណៈដល់សហគមន៍ខ្មែរយ៉ាងគួរឱ្យផ្ញាក់ផ្អើល ។ អ្នកស្រី រីដា ម័រសេ្យ សមាជិកក្រុមប្រឹក្សាសាលាក្រុងបានយល់ពីសារប្រយោជន៍ដ៏ធំធេងនៃតួនាទីផ្តល់ព័ត៌មានដល់សហគមន៍ជាទូទៅក៏ស្នើទៅលោកអភិបាលក្រុងឱ្យធ្វើការអានសញ្ញាប័ត្រនៅចំពោះក្រុមប្រឹក្សាសាលាក្រុងទាំងមូលនៅថ្ងៃខាងមុខ រីឯលោក វ៉ាស្នា នួន បានបញ្ចេញយោបល់ថា កាសែតនេះ និងមានតួរនាទីបំរើផលប្រយោជន៍ខ្មែរ និងសហគមន៍ខ្មែរមុនគេទាំងអស់ ។ ឃើញការិយាល័យខ្លួនស្ថិតនៅចំពីមុខទីស្នាក់ការ "ឡូស័ន" ដ៏ធំស្កឹមស្កៃ ហើយបំរើព័ត៌មានក្នុងតំបន់ជាយូរមកហើយនោះលោក វ៉ែវ សំខុនពិន នាយកខ្មែរផុសនិយាយថា "ដោយសារមានខ្មែរច្រើនរស់នៅទីនេះ យើងប្រាកដជាអាចទិញយកអាគារនេះ ទាំងមូលបាននាថ្ងៃមុខ" តែលោកអភិបាលក្រុងតបនឹងប្រយោគនេះថា "ទំនងជាក្រុមមេធាវីដែលជាភ្ញៀវនៅក្នុងអាគារនេះយូរហើយមិនយល់ព្រមទេ" ។ ស៊ូមិន ពិន នាយិកាខ្មែរផុសបានបន្តប្រយោគពីការសម្រេចចិត្តប្តូរទីតាំង ហើយអរគុណភ្ញៀវដែលបានអញ្ជើញមកចូលរួម ជាពិសេសអរគុណដល់តំណាងអង្គភាពជាច្រើនដែលបានប្រើសេវារបស់ខ្មែរផុស ដើម្បីគាំទ្រការងារ ឬពាណិជ្ជកម្មរបស់ខ្លួន ៕

តមកពីទំព័រទី ៦

## អ្នកបាត់ឈ្មោះអស់សង្ឃឹមពេលការបោះឆ្នោត...

លោក ជា ផាត បាននិយាយថា "ខ្ញុំបានរកឈ្មោះរបស់ខ្ញុំឃើញហើយ ប៉ុន្តែឈ្មោះរបស់ប្អូនថ្លៃខ្ញុំ គឺរកមិនឃើញទេ ។ គាត់បោះឆ្នោតនៅទីនេះជាយូរឆ្នាំមកហើយ ។ ប្រសិនបើខ្ញុំមិនអាចរកឈ្មោះរបស់ប្អូនថ្លៃខ្ញុំឃើញទេ គាត់មិនអាចបោះឆ្នោតបានឡើយ" ។

នៅពេលពឹងសង្កាត់មន្ត្រីទាំងនោះបានត្រឹមជួយរកឈ្មោះឱ្យអ្នកបោះឆ្នោតប្រាប់ពួកគេឱ្យទូរស័ព្ទទៅសួរគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត ឬបើមិនដូច្នោះទេ គឺនិយាយថា វាយឺតពេលហើយ មិនអាចធ្វើអ្វីបានតែម្តង ។

លោក គល់ បញ្ញា នាយកប្រតិបត្តិគណៈកម្មាធិការដើម្បីការបោះឆ្នោតដោយសេរី និងយុត្តិធម៌នៅកម្ពុជា ហៅកាត់ថា ខុមហ្វ្រែល ដែលធ្លាប់បានព្រមានថា ប្រជាពលរដ្ឋ១.២៥លាននាក់អាចបាត់បង់សិទ្ធិបោះឆ្នោតនោះលើកឡើងថា គជប បានព្យាយាមទប់ស្កាត់មិនឱ្យឈ្មោះរបស់អ្នកមានសិទ្ធិបោះឆ្នោតបាត់ពីបញ្ជីឈ្មោះបោះឆ្នោត ។

លោកបានមានប្រសាសន៍ថា "ប៉ុន្តែខ្ញុំនៅតែព្រួយបារម្ភថា ប្រជាពលរដ្ឋជាច្រើននឹងជួបប្រទះបញ្ហានេះ ជាពិសេសនៅតាមតំបន់ក្រុងដែលគណបក្សប្រឆាំងមានអ្នកគាំទ្រយ៉ាងច្រើននោះ" ។

អង្គការខុមហ្វ្រែលបានឱ្យដឹងថា នៅក្នុងចំណោមអ្នកមានសិទ្ធិបោះឆ្នោតចំនួន៤៦០នាក់ដែលមិនអាចរកឈ្មោះរបស់ខ្លួនឃើញនៅថ្ងៃបោះឆ្នោតក្នុងឆ្នាំ២០០៨មានពាក់កណ្តាលស្ថិតក្នុងរាជធានីភ្នំពេញ នេះគ្រាន់តែនៅរាជធានីភ្នំពេញមួយប៉ុណ្ណោះ ។

ឈ្មោះអ្នកដែលចុះឈ្មោះបោះឆ្នោតរួចហើយ ប៉ុន្តែដែលបានបាត់ឈ្មោះពីក្នុងបញ្ជីបោះឆ្នោតនៅក្នុងឆ្នាំនេះត្រូវអង្គការខុមហ្វ្រែលបញ្ជូនទៅគណកម្មាធិការជាតិរៀបចំការបោះឆ្នោតបីបួនសប្តាហ៍មុន ប៉ុន្តែមិនបានទទួលការឆ្លើយតបវិញឡើយ ។

ប៉ុន្តែលោក គល់ បញ្ញា បានលើកឡើងថា មានអ្នកបោះឆ្នោតមួយចំនួនហាក់បីដូចជាមិនខ្វល់ពីការស្វែងរកឈ្មោះរបស់ខ្លួនក្នុងបញ្ជីផង ទេ គឺទាំងការរកឈ្មោះដោយផ្ទាល់ ឬស្វែងរកតាមអ៊ីនធើណេត ។

លោកបានថ្លែងថា "សូម្បីតែនៅក្នុងរាជធានីភ្នំពេញ មានមនុស្សជាច្រើនដែលមិនអាចស្វែងរកឈ្មោះរបស់ខ្លួនឃើញនៅតាមអ៊ីនធើណេត គឺមានតែយុវជនតែប៉ុណ្ណោះ" ។

ទោះបីជាដូច្នេះក្តី អង្គការខុមហ្វ្រែល និងសមាគមយុវជនមួយចំនួនបានសេចក្តីថ្លែងការណ៍រួមមួយទៅគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតដោយជំរុញឱ្យគណៈកម្មាធិការនេះលុបចោលផែនការដកបញ្ជីឈ្មោះបោះឆ្នោតចេញពីគេហទំព័ររបស់ខ្លួនមួយថ្ងៃមុនការបោះឆ្នោត ដើម្បីជួយប្រជាពលរដ្ឋជាពិសេស គឺយុវជនដែលនៅតែព្យាយាមស្វែងរកឈ្មោះរបស់ខ្លួន និងឈ្មោះអ្នកមានសិទ្ធិបោះឆ្នោតផ្សេងៗទៀត ។

លោក ទេព នីថា អគ្គលេខាធិការគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបាននិយាយការពារការសម្រេចចិត្តនេះ ។

លោកបានមានប្រសាសន៍ថា យើងនឹងបិទគេហទំព័រនេះ ពីព្រោះយើងមិនចង់ឱ្យនរណាម្នាក់ប្រើវា ដើម្បីឃោសនាអំឡុងរយៈពេលពីរថ្ងៃមុនការបោះឆ្នោតទេ ពីព្រោះវាផ្ទុយទៅនឹងបទបញ្ញត្តិរបស់គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត ។

លោក ទេព នីថា មិនបានរៀបរាប់ពីបទបញ្ញត្តិទាំងនោះថា ជាបទបញ្ញត្តិអ្វី ឬថាតើបញ្ជីឈ្មោះបោះឆ្នោតត្រូវបានគេប្រើដើម្បីឃោសនាដោយរបៀបណាទេ ។

ប៉ុន្តែលោកបាននិយាយការពារបញ្ជីឈ្មោះបោះឆ្នោត ហើយបានលើកឡើងថា ឈ្មោះដែលត្រូវបានលុបចេញពីបញ្ជីឈ្មោះអ្នកបោះឆ្នោត គឺជាឈ្មោះអ្នកបោះឆ្នោតណាដែលបានចាកចេញពីស្រុកភូមិរបស់ខ្លួនជាអចិន្ត្រៃយ៍ ឬបានចាកចេញពីផ្ទះរបស់ខ្លួនអស់រយៈពេលជាច្រើនឆ្នាំ ។

លោកក៏បានណែនាំឱ្យអ្នកដែលមានបញ្ហាក្នុងការរកឈ្មោះរបស់ខ្លួននៅថ្ងៃបោះឆ្នោតឱ្យទូរស័ព្ទទៅកាន់លេខពិសេសមួយក្នុងចំណោមលេខពិសេសទាំង៥ខ្សែដែលគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបានបើកឱ្យប្រើប្រាស់ ។ ប៉ុន្តែលោក គល់ បញ្ញា មានប្រសាសន៍ថា លេខពិសេសទាំងនោះ វាហាក់ដូចជាយឺតពេលទៅហើយ ហើយមកដល់ដំណាក់កាលនេះលេខទាំងនេះ គឺគ្រាន់តែអាចរាប់ចំនួនអ្នកដែលមានបញ្ហាក្នុងការស្វែងរកឈ្មោះរបស់ខ្លួនតែប៉ុណ្ណោះ ។ រីឯការស្វែងរកដំណោះស្រាយវិញ គឺប្រហែលជាមិនអាចទៅរួចហើយ ៕

*(រាយការបន្ថែមដោយ អូន ភាព)*
*ប្រែសម្រួលដោយ ស៊ា ស៊ីុយឈាង*

# វិស្វកម្មក្នុងចិត្តមនុស្ស
# The human inner engineering

**តពីលេខមុន**

តាមពិតមុននេះមានគំនិតមួយចេញមកបណ្តាលឱ្យកើតសំដីនេះឡើង ។ ចុះគំនិតនេះមកពីណាមក? វាចេញពីឃ្លាំងម៉េម័រី ចុះម៉េម័រីនេះមកពីណាដែរ នោះសុទ្ធតែជាទិន្នន័យ ឬ Data ដែលសង្គមមនុស្សហុចមកឱ្យយើងម្នាក់ៗនោះឯង ។ ប្រព័ន្ធរូបកាយ និងចិត្តនេះធ្វើចលនាដោយមានកម្លាំងជំរុញពីទិន្នន័យនេះឯង ។ តាមន័យនេះមនុស្សខ្លួនឯងពុំបាននិយាយអ្វីឡើយ ។ ពាក្យសំដីនោះមានប្រភពមកពី Data ពីខាងក្រៅប៉ុណ្ណោះ ។ មានន័យម្យ៉ាងទៀតថា សង្គមមនុស្សបានខ្ចីមាត់ ខួរក្បាល ប្រព័ន្ធរូបកាយ និងចិត្តយើងប្រើប៉ុណ្ណោះ ។ បាតុភូមគ្រប់គ្រងដោយប្រព័ន្ធម៉េម័រី ដូចរៀបរាប់ខាងលើនេះ ក្នុងសាសនានានាគេហៅថា កម្លាំងកម្មផលក្នុងភាសាចិត្តសាស្ត្រទំនើប គេហៅថា Subconsciousne ហើយក្នុងភាសាសំស្ក្រិតគេហៅថា Samsksara ។ ដូច្នេះ


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

សកម្មភាពរបស់មនុស្សសាមញ្ញ ឬមនុស្សបូរាណឋិតនៅក្រោមបញ្ជាផ្តាច់មុខរបស់ប្រព័ន្ធម៉េម័រី ហើយប្រការនេះបាននាំមកនូវផលជាគុណសម្បត្តិ និងគុណវិបត្តិដូចតទៅ :

**គុណសម្បត្តិ :**

ម៉េម័រីនេះជាប្រភពព័តិមានដ៏សំបូរបែបបើកផ្លូវឱ្យមនុស្សយើងអាចធ្វើសកម្មភាពដឹកនាំជីវិតក្នុងលោកយើងនេះបាន ដូចជាអាចអានសៀវភៅ អាចបើកឡាន អាចធ្វើម្ហូបអាចគិតពិចារណារកខុសត្រូវ និងអាចធ្វើការងារចញ្ចឹមជីវិតសព្វយ៉ាង ។ល។ មើលចុះក្មេងអាយុ២ឬ៣ឆ្នាំ វាពុំចេះអានសៀវភៅ ឬពុំយល់អ្វីឡើយ ព្រោះម៉េម័រីរបស់គេតិចតួចនៅឡើយ ។ ការរៀនសូត្រសព្វយ៉ាងក្នុងលោកយើងនេះ តាមធាតុពិត គឺជាការបញ្ចូល ម៉េម័រី ឬប្រូក្រាមនានាទៅក្នុងប្រព័ន្ធរូបកាយ-ចិត្តមនុស្សប៉ុណ្ណោះ ។

ពីសតវត្សទី១១ រហូតមកដល់សតវត្សយើងនេះ សតវត្សទី២១ ប្រវត្តិសាស្ត្រមនុស្សបានបង្ហាញថា មនុស្សបានដាក់ទម្ងន់ខ្ពស់លើការប្រើប្រាស់ខួរក្បាល ការប្រើប្រាស់ម៉េម័រី គិតគូរពិចារណារកហេតុផល តាមប្រព័ន្ធឡូស៊ីក (The age of Reason) ។ គេកំណត់ថា ខ្លឹមសាររបស់មនុស្សគឺការចេះគិតពិចារណាតែមួយគត់ គឺចប់ប៉ុណ្ណោះ ពុំមានអ្វីលើសនោះឡើយ ។ ការប្រើប្រាស់ម៉េម័រី ឬខួរក្បាលគិតពិចារណានេះ បានក្លាយជាមូលដ្ឋានបង្កើត និងនាំមកនូវការរកឃើញថ្មីៗ ការអភិវឌ្ឍន៍វិទ្យាសាស្ត្រវិស្វករបច្ចេកទេសទំនើបលើគ្របវិស័យ ដូចជា គណិតវិទ្យា រូបវិទ្យា គីមីវិទ្យា សង្គមវិទ្យា ចិត្តវិទ្យា តារាសាស្ត្រ ទស្សនៈវិទ្យា កុំព្យូទ័រ អ៊ិនធើណេត ។ល។ ពពួកមនុស្សបែបនេះ គឺជាក្រុមសម្ភារៈនិយម (Materialism) ។ ពួកគេពុំជឿលើអ្វីដែលឋិតនៅក្រៅប្រព័ន្ធហេតុផលឡើយ ។ គេតែងរិះគន់សាសនា និងជំនឿនានា ។ គេជឿតែម្យ៉ាងគត់ គឺលទ្ធផលនៃការរកឃើញវិទ្យាសាស្ត្រប៉ុណ្ណោះ ។ ពួកគេចាត់ទុកក្រុមគេជាមនុស្សទំនើបបំផុត និងផ្តាច់ខ្លួន ហើយតាំងជាម្ចាស់ត្រួតត្រាលើធម្មជាតិទាំងមូល ។ តើពិតដូច្នោះមែនឬទេ? សូមបន្តអានទៅទៀត អ្នកនឹងរកឃើញការពិតពុំខានឡើយ ។

**គុណសម្បត្តិនៃការប្រើប្រាស់មេម័រី**

១-ប្រព័ន្ធម៉េម័រីនេះ ផលិតលំហូរគំនិតមកក្នុងខួរក្បាលមនុស្សជាបរិមាណហួសអំពីសេចក្តីត្រូវការ ។ អ្នកវិទ្យាសាស្ត្រទំនើបបានរកឃើញថា ក្នុង២៤ម៉ោងមានលំហូរគំនិត៦០.០០០ឆ្លងកាត់ខួរក្បាលដ៏តូចនេះ ។ តាមជាក់ស្តែងមនុស្សយើង ត្រូវការខ្សែគំនិតប្រមាណជា៥%ប៉ុណ្ណោះ សំរាប់គិតគូរធ្វើសកម្មភាពរស់នៅសព្វយ៉ាង ចំណែកឯ៩៥%ទៀត សុទ្ធតែជាសំរាមជារបស់ឥតប្រយោជន៍ហូរចូលមកក្នុងខួរក្បាលយ៉ាងគគុក ដូចទឹកហៀរបាក់ទំនប់មនុស្សខ្លួនឯងគ្មានសិទ្ធ និងទប់ ឬជ្រើសរើសអ្វីឡើយ ។ ទាំងនោះនាំមកតែការរំខាន ព្រមទាំងបណ្តាលឱ្យប្រើប្រាស់ថាមពលក្នុងរូបកាយមនុស្សដ៏ខ្ជះខ្ជាយទៀតផង ។ យ៉ាងណាមិញមនុស្សខ្លះភ្លាត់មាត់ចេញមកក្រៅនូវពាក្យពេចន៍ដែលខ្លួនពុំចង់ឱ្យគេដឹងឡើយ ។ អ្នកខ្លះនិយាយម្នាក់ឯងកោកៗហូរហែរពុំចេះចប់ឡើយ ។ បើអ្នកពិនិត្យខួរក្បាលខ្លួនឯងទៅនោះ អ្នកនឹងឮសូរសម្លេងផុសពីក្នុងមកជាប់ជានិច្ច ។ ឧបដិហេតុដែលខ្ញុំរៀបរាប់មកនេះ គឺបណ្តាលដោយម៉េម័រីផ្ទុះចេញមកក្រៅនេះឯង ។

បើមនុស្សត្រូវការពិចារណាអំពីអ្វីមួយដោយលំហូរគំនិតមានចំនួនលើសលប់នោះ គេដឹងឋិតនៅក្នុងសភាពឡិបឡប់ៗភ្លេចមុខភ្លេចក្រោយ ភ្លឹបភ្លែត ពិបាកសម្រេច ។ ហើយម្យ៉ាងទៀតគំនិតដែលលេចឡើងមកនេះ **តទៅលេខក្រោយ**

តមកពីទំព័រទី ០៦

## ការប្រឹងប្រែងនៅនាទីចុងក្រោយ...

សង្ស័យលើភាពស្របច្បាប់ក្នុងការបោះឆ្នោតនេះទៅហើយ ។ ខ្ញុំគិតថា ឥឡូវនេះគឺជាបញ្ហាចុងក្រោយ" ។ លោកបានមានប្រសាសន៍ថា "តើការបោះឆ្នោតនេះ មានន័យអីដែលនាយករដ្ឋមន្ត្រីមិនមានគូប្រកួតប្រជែងនោះ? ខ្ញុំគិតថា ពិភពលោកទាំងមូលនឹងសើចនៅពេលគាត់និយាយថាគាត់ គឺជាអ្នកឈ្នះក្នុងការបោះឆ្នោតនេះ" ។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សសង្គ្រោះជាតិក៏បានអះអាងកាលពីថ្ងៃម្សិលមិញដែរថា សេចក្តីសម្រេចទាំងពីរក្នុងការបដិសេធសំណើររបស់លោក សម រង្ស៊ី នឹងធ្វើឱ្យប៉ះពាល់ដល់ភាពស្របច្បាប់នៃលទ្ធផលការបោះឆ្នោតនៅថ្ងៃអាទិត្យ ។

លោកបានមានប្រសាសន៍ថា ការបោះឆ្នោតនេះនឹងមិនសេរី និងយុត្តិធមិទាល់តែសោះ ។ ក្នុងចំណោមអនុសាសន៍ទាំង១៨ចំណុចរបស់លោក សុរិយា ស៊ុបបេឌី "ប្រេសិតសិទ្ធមនុស្សអង្គការសហប្រជាជាតិ"មិនត្រូវបានអនុវត្តចំណុចណាឡើយ" ។

លោក យឹម សុវណ្ណ លើកឡើងពីរបាយការណ៍មួយដែលលោក សុរិយា ស៊ូបេឌី បានចេញកាលពីខែកក្កដាឆ្នាំមុន ដែលបានស្នើឱ្យមានការធ្វើកំណែទម្រង់គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត ព្រមទាំងឱ្យមានការវិលត្រឡប់របស់លោក សម រង្ស៊ី ដើម្បីធានាឱ្យមាន"ការចូលរួមប្រកួតប្រជែងដោយស្មើភាពពីគ្រប់គណបក្សនយោបាយទាំងអស់" ។

លោកបានមានប្រសាសន៍ថា "មានតែពាក់កណ្តាលនៃចំណុចមួយប៉ុណ្ណោះត្រូវបានអនុវត្តពីព្រោះលោក សម រង្ស៊ី គ្រាន់តែត្រូវបានអនុញ្ញាតឱ្យវិលត្រឡប់មកវិញតែប៉ុណ្ណោះ ប៉ុន្តែមិនអនុញ្ញាតឱ្យឈរឈ្មោះក្នុងការបោះឆ្នោតនេះទេ ។ ខ្ញុំនឹងសួររដ្ឋាភិបាលថា តើពួកគេចង់ឱ្យមានការបោះឆ្នោតនេះសេរី និងយុត្តិធមិទេ? តើពួកគេចង់ឱ្យរដ្ឋាភិបាលក្រោយនេះស្របច្បាប់ដែរ ឬទេ?" ។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីបាននិយាយការពារសេចក្តីសម្រេចទាំងនេះថា សេចក្តីសម្រេចទាំងនេះធ្វើតាមនីតិវិធីត្រឹមត្រូវ ។

លោក ផៃ ស៊ីផាន បានមានប្រសាសន៍ថា "មនុស្សជាច្រើនត្អូញត្អែរថា ការបោះឆ្នោតនេះមិនសេរី ឬត្រឹមត្រូវដោយសារតែមនុស្សម្នាក់ ។ មានមនុស្សជាង១៤លាននាក់នៅក្នុងប្រទេសកម្ពុជា ហើយមនុស្សគ្រប់គ្នាមានសិទ្ធិស្មើគ្នានៅក្រោមច្បាប់ ។ សម រង្ស៊ី គ្រាន់តែជាបុគ្គលម្នាក់តែប៉ុណ្ណោះ ។ គាត់គឺជាមនុស្សធម្មតាម្នាក់ ៕

*ប្រែសម្រួលដោយ មូល គីមហឿន*

# អ្វីខ្លះដែលគួរដឹងពីការបោះឆ្នោតនៅកម្ពុជា

**-ថ្ងៃបោះឆ្នោត : ២៨កក្កដា ឆ្នាំ២០១៣**
**-ចំនួនមណ្ឌល : ២៤**
**-អាសនៈ : ១២៣**
**-អ្នកចុះឈ្មោះបោះឆ្នោត : ៩.៦៧៥៤៥៣នាក់**
**-ចំនួនគណបក្ស : ៨**

១-គណបក្សជាតិខ្មែរ ប្រធានលោក សេង សូតេង
២-គណបក្សហ្វុនស៊ិនប៉ិច ព្រះអង្គម្ចាស់ក្សត្រី ន.អរុណរស្មី
៣-គណបក្សសាធារណរដ្ឋប្រជាធិបតេយ្យ ប្រធានអ្នកស្រី សុខ រដ្ឋ សុវណ្ណបញ្ញោ ក្សីឡា
៤-គណបក្សប្រជាជនកម្ពុជា ប្រធានលោក ជា ស៊ីម
៥-គណបក្សអភិវឌ្ឍន៍សេដ្ឋកិច្ចប្រធានលោក ហួត រាជចំរើន
៦-គណបក្សខ្មែរឈប់ក្រប្រធានលោក ក្រវិញ ដារុណ
៧-គណបក្សសង្គ្រោះជាតិ ប្រធានលោក សម រង្ស៊ី
៨-គណបក្សសម្ព័ន្ធដើម្បីប្រជាធិបតេយ្យ ប្រធានលោក ក្រម វាស្នា

**-អ្នកសង្កេតការជាតិ និងអន្តរជាតិចំនួន ២០.៩៤៦**
**-ចំនួនបេក្ខជនឈរឈ្មោះទាំង២៤មណ្ឌលមាន ៨៧៨**
**-បែងចែកអាសនៈតាមខេត្ត :**




តមកពីទំព័រទី ០៧

## លោក កឹម សុខា សម្តែងការព្រួយបារម្ភ...

សិទ្ធិមនុស្សរបស់អង្គការសហប្រជាជាតិប្រចាំប្រទេសកម្ពុជា ដើម្បីសម្តែងការព្រួយបារម្ភចំពោះភាពតានតឹងកាន់តែខ្លាំងឡើង ។

លោកក៏បានមានប្រសាសន៍ដែរថា លោកបានស្នើជាពិសេសឱ្យអង្គការសហប្រជាជាតិស៊ើបអង្កេតហេតុការណ៍ប៉ះទង្គិចគ្នា កាលពីថ្ងៃពុធ ក្នុងខណ្ឌឫស្សីកែវ រាជធានីភ្នំពេញ និងហេតុការណ៍មួយកើតឡើងកាលពីពេលរំលងអធ្រាត្រឈានចូលព្រឹកថ្ងៃសៅរ៍ដែលក្នុងនោះ គ្រាប់កាំភ្លើងមួយគ្រាប់ត្រូវបានបាញ់ទម្លុះទ្វារកញ្ចក់នៃទីស្នាក់ការកណ្តាលរបស់គណបក្សសង្គ្រោះជាតិ ។

លោកបានមានប្រសាសន៍ថា លោកក៏បានស្នើឱ្យតំណាងមួយរូបរបស់អង្គការសហប្រជាជាតិឃ្លាំងមើលការធ្វើយុទ្ធនាការឃោសនាបោះឆ្នោតនៅអ្នកលឿងក្នុងខេត្តព្រៃវែងជាតំបន់មួយដែលមានជនជាតិវៀតណាមរស់នៅច្រើនផងដែរ និងដែលលោក កឹម សុខា និងលោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិបានចុះធ្វើយុទ្ធនាការឃោសនាកាលពីម្សិលមិញ ៕

*ប្រែសម្រួលដោយ តែម សុខុម*



# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហាង

ជោគជតាប្រចាំសប្តាហ៍




រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕




រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាឃីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហា គូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕




លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕




រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕




រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕




អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិត ផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញ ទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕




នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕




លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕




លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕




ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕




លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕




រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើ អាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

# ពិធីបុណ្យប្រជាជន ឬហ្វូកហ្វេសធីវ៉ល FOLK FESTIVAL 2013

**ដោយៈ ខ្មែរផុសស.រ.អា**

**ក្រុងឡូវែលៈ** ពិធីបុណ្យប្រជាជន ឬហ្វូកហ្វេសធីវ៉ល FOLK FESTIVAL 2013 នឹងប្រព្រឹត្តទៅរយៈពេលបីថ្ងៃចុងសប្តាហ៍នេះ ត្រូវនឹងថ្ងៃសុក្រ-សៅរ៍ និងអាទិត្យ ថ្ងៃទី២៦ ២៧ និង២៨ ខែកក្កដា ឆ្នាំ២០១៣ ។ ពិធីបុណ្យនេះជាពិធីបុណ្យដ៏ធំមួយក្នុងរដូវក្តៅ ហើយប្រជាជនខ្មែរ និងមនុស្សគ្រប់គ្នាទាំងជិតឆ្ងាយតែងតែសប្បាយរីករាយចូលរួមយ៉ាងកុះករ ព្រោះពិធីបុណ្យនេះមានបង្ហាញនូវការសម្តែងរបស់ជាតិសាសន៍ចម្រុះវត្ថុសិល្បៈហត្ថកម្មម្ហូបអាហារប្រជាជនរបស់របាយជាតិសាសន៍នានាសម្រាប់ភ្ញៀវ និងទិញសកម្មភាពកំសាន្តលក្ខណៈគ្រួសារ និងសកម្មភាពគួរឱ្យចាប់អារម្មណ៍ជាច្រើនទៀត។ ពិធីបុណ្យប្រជាជន ឬហ្វូកហ្វេសធីវ៉ល FOLK FESTIVAL 2013 នៅចំកណ្តាលក្រុងឡូវែល ហើយនឹងមានការបិទផ្លូវដូចមានបញ្ជាក់ឈ្មោះខាងក្រោម :



**2013 FOLK FESTIVAL STREET CLOSINGS July 26, 27 & 28**

| | |
|---|---|
| **John Street**<br>Merrimack Street to Paige Streets | Fri. 4:00 PM to Sun. 9:00 PM |
| **Lee Street**<br>Reverse Direction | Fri. 4:00 PM to Sun. 9:00 PM |
| **Shattuck Street**<br>Merrimack Street to Market Street | Sat. 9:00 AM to 12:00 AM<br>Sun. 9:00 AM to 7:00 PM |
| **French Street**<br>John Street to Kirk Street<br>Kirk St. to Arcand Drive (East bound Lane) | Fri. 6:00 AM to Sun. 9:00 PM<br>Fri. 12:00 PM to Sun. 9:00 PM |
| **Merrimack Street**<br>Bridge Street to Dutton Streets | Fri. 6:15 PM to Sun. 9:00 PM |
| **Central Street**<br>Market Street to Middle Street | Friday 6:00 PM to 12:00 AM<br>Sat. 9:00 AM to 12:00 AM<br>Sun 9:00 AM to 9:00 PM |
| **Paige Street**<br>John Street to Kirk Street | Sat. 9:00 AM to Sun. 9:00 PM |
| **Market Street**<br>Dutton Street to Palmer Street | Sat. 9:00 Am to Sun. 12:00 AM<br>Sun 9:00 AM to 9:00 PM |
| **Market Street**<br>Palmer St. to Central St. (Two Way Traffic) | Sat. 9:00 AM to Sun. 12:00 AM<br>Sun. 9:00 AM to 9:00 PM |
| **Arcand Drive**<br>Merrimack St. to Father Morissette Blvd. | Sat. 9:00 AM to 8:00 PM<br>Sun 9:00 AM to 8:00 PM |
| **Middle Street**<br>Central Street to Shattuck Street | Fri. 6:00 PM to Sat 6:00 AM<br>Sat. 9:00 AM to Sun. 6:00 AM<br>Sun 9:00 AM to 9:00 PM |
| **Palmer Street**<br>Market Street to Merrimack Street | Fri. 6:00 PM to Sat 6:00 AM<br>Sat. 12:00 PM to Sun. 6:00 AM<br>Sun. 9:00 AM to 9:00 PM |
| **Palmer Street (Two Way Traffic)**<br>Market Street to Middle Street | Sat. 7:00 AM to 12:00 PM |
| **Worthen Street**<br>Arcand Drive to Merrimack Street | Friday 3:00 PM to Sunday 9:00 PM |
| **O'Connell Street**<br>Market Street to Merrimack Street | Friday 3:00PM to Sunday 9:00 PM |

តមកពីទំព័រទី ០១ សម រង្ស៊ី ត្រូវបានរាស្ត្រទទួលដូច...

ស្របពេលជាមួយគ្នានេះ លោក ហ៊ុន សែន បានជួបគ្រាលំបាកមួយទៀត ដោយឪពុកបង្កើតរបស់លោកបានចែកឋានមុនលោក សម រង្ស៊ី មកដល់បន្តិច...។ បូកទាំងអវត្តមានសម្តេចនរោត្តម សីហនុមួយទៀត ការបោះឆ្នោតលើកនេះ បានធ្វើឱ្យលោក ហ៊ុន សែន នៅកំព្រាឯកោជាទីបំផុត ។

នៅពេលមកដល់ភ្លាម១ លោក សម រង្ស៊ី បានតវ៉ាពីសិទ្ធិបោះឆ្នោតរបស់ខ្លួន ហើយចង់ឈរ



សម រង្ស៊ី .កឹម សុខា ស្ញាទល់នឹងស្នារីករាយនឹងឃើញប្រជារាស្ត្រច្រើនមកទទួល

ឈ្មោះនៅខេត្តកំពង់ចាម តទល់នឹងលោក ហ៊ុន សែន តែបានត្រូវគជបទាត់ចោលសំណើរនោះ ។ នៅតែមមាញឹកក្នុងការបង្ហាញមុខឱ្យគ្រប់ខេត្តក្រុងបានឃើញមនុស្សម្នាបានឆ្លើយតបមកទទួលមេដឹកនាំគណបក្សសង្គ្រោះជាតិច្រើនហួសពីការសង្ឃឹម ។

មានសង្ឃឹមថា អាចនឹងឈ្នះឆ្នោត តែលោក សម រង្ស៊ី ត្រូវប្រឈមមុខទប់ស្កាត់ការបន្លំសន្លឹកឆ្នោត ការលួចបញ្ចូលឈ្មោះខ្មោចឱ្យបោះឆ្នោតឱ្យគណបក្សប្រជាជនការបំភិតបំភ័យដែលនៅតែមាននៅឡើយតាមជនបទ ។ តែទោះជាយ៉ាងណាក៏ដោយគេឃើញគណបក្សសង្គ្រោះជាតិមានការរៀបចំប្រសើរមានធនធានដែលបញ្ជូនពីក្រៅប្រទេសដោយក្រុមគ្រួសារខ្មែរបានគ្រប់គ្រាន់មានធនធានមនុស្សសំរាប់កាន់ការជាច្រើន ជាពិសេសគោលជំហរឃោសនានយោបាយដែលថា តម្លើងប្រាក់បៀវត្សរ៍ដល់មន្ត្រីរាជការដល់មនុស្សចាស់ដល់មេគ្រួសារទាំងអស់គ្នាមានជំនឿថា គណបក្សសង្គ្រោះជាតិប្រាកដជាអាចធ្វើបានដោយមិនបាច់ប្រឹង ។

នៅស.រ.អាឯណោះគេនៅចងចាំថា "ហ្វីឡាដែលហ្វៀមានគុណសម្បត្តិជាអ្នកផ្តួចផ្តើមបង្កើតគណបក្សសិទ្ធិមនុស្ស ហើយចិញ្ចឹមរហូតបានធំធាត់ -ចំណែកឡូវែលបានរក្សាជំរុំគណបក្ស សម រង្ស៊ី បានយ៉ាងមូលមាំថែកម្លាំងកាយ និងចិត្តប្រធាន សម រង្ស៊ី រហូតដល់បានសម្រេចសម្ព័ន្ធភាពដ៏ស្រស់ស្អាតជាមួយនឹងគណបក្សសិទ្ធិមនុស្ស ហើយទាំងពីរក្រុមនេះជាក្បាលម៉ាស៊ីនធ្វើឱ្យគណបក្សសង្គ្រោះជាតិមានវាស្នាដូចថ្ងៃនេះ"

សម រង្ស៊ី-កឹម សុខា ទាំងពីរនាក់ឈរកៀកស្មាគ្នា ញញឹមគ្មានញញើតនឹងអំណាចលោក ហ៊ុន សែន ដែលនាំគ្នាសំដៅទៅគោលដៅរួមតែមួយ តែតាមការពិត ដូចគ្នានឹងអ្នកតស៊ូដើម្បីលទ្ធិប្រជាធិបតេយ្យនៅកម្ពុជាទាំងអស់ គឺមានប្រវត្តិតស៊ូខុសគ្នា នៅកន្លែងផ្សេងគ្នា ជំនឿមិនដូចគ្នា តែថ្ងៃនេះប្រកាន់វិន័យនឹងជំនឿតែមួយបាន គឺដើម្បី "ប្តូរដៃនៃអំណាចរដ្ឋ" ឱ្យខាងតែបាន ៕




# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

## Homecare Agency

Group Adult Foster Care Program (GAFC)
MassHealth

ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន
បុគ្គលិកមានសណ្ដានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ
អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ



Compassionate Care & Reliable
Professional & Cultural Sensitive
Management & Staffs speak Khmer

កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហាវាំរ៉ៃផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្ដល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្ដង ។

Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.

### ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :

To be eligibled for GAFC you must:

- រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)
- អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)
- មាស់ហែលស្តង់ដា (eligible for Masshealth Standard)
- ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀក-ពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)
- មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក (have physician statement of your condition)
- ត្រូវបានវាយតំលៃផ្នែកសុខភាព និងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )

### ផលប្រយោជន៍ទទួលបាន :

Benefits you will get:

- ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)
- ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)
- ផែនការថែទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសមានីជើ (an individual care plan developed by a registered nurse and case manager)
- វាយតំលៃលើសេចក្ដីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)
- សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

ដើម្បីចុះឈ្មោះសូមទាក់ទងមក
To register, please contact:



ឱក តុលាយុត្ដិ ឡូវែល
Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404, Lowell, MA 01852



ពិន ឆាវ៉ាន់ លីន រីវៀរ បូស្តុន
Chhavan Pin: Lynn, Revere, Boston
Tel:(617)783-7177, Fax: (617) 783-7188
Office: 214 Lincoln St., Suite 200, Allston, MA 02134

# ភូឡាប់ប៉ៃលិន

**GRAND OPENING**

Asian & International foods Market

## ហាងឧបភោគបរិភោគ ទើបប្ដូរម្ចាស់បើកថ្មី

6 Branch St. Lowell MA 01851 (978)-459-1780




- មានលក់បន្លែបង្កាស្រស់គ្រប់មុខ មានផ្លែឈើមកដល់ថ្មីរាល់ថ្ងៃ
- ត្រីសាច់ គ្រឿងសមុទ្រ ម្ហូបហាលស្ងួត គ្រឿងកំប៉ុង ម្ហូបគ្រប់យ៉ាង មកពីអាស៊ី -អង្ករគ្រប់ធន់
- មានម្ហូបឆ្អិនស្រេច ជាកឡូវ ទាខ្វៃ ចៅខ្វៃ នំនែក ។ល។
- មានតវ៉ាន់ចុះថ្លៃច្រើនមុខរាល់ថ្ងៃ :

យើងទទួល Credit Card គ្រប់យ៉ាងទទួល Food Stamp Card
មានកន្លែងចតរថយន្តខាងមុខ និងខាងក្រោយហាងធំទូលាយ

DISCOVER VISA MasterCard SNAP

Fresh Produce
- Poultry
- Meats
- Fish and Seafoods
- Veggebles
- Can foods
- Kitchenwares etc

ម៉ោងបើកចាប់ពីម៉ោង៩:00AM-៨:00PM

































